

ក្រសួងអប់រំ យុវជន និងកីឡា

# វិទ្យាសាស្ត្រ-សិក្សាសង្គម









៣



គ្រឹះស្ថានបោះពុម្ពនិងចែកផ្សាយ



ក្រសួងអប់រំ យុវជន និងកីឡា

# វិទ្យាសាស្ត្រ_សិក្សាសង្គម

## ថ្នាក់ទី ៣



បោះពុម្ពផ្សាយដោយ

**គ្រឹះស្ថានបោះពុម្ពនិងចែកផ្សាយ**

អគារ ១៥៩ មហាវិថី ព្រះនរោត្តម ភ្នំពេញ

**គណៈកម្មការនិពន្ធ** លោកស្រី អ៊ឹង គីមសាន លោកស្រី ថាច់ ធីសារ៉ន

លោក ឃិន សុតារា លោកស្រី វ៉ាន់ សុភី

**អ្នកវាយអត្ថបទ** លោក ជុំ សត្យា

**វិចិត្រករ** លោក ឡុង សុវណ្ណា

**អ្នករៀបរៀង** លោក សេង តុងបុត្តា

**អ្នករចនាទំព័រ** លោក ជុំ សត្យា

**គណៈកម្មការពិនិត្យ** លោក យ៉ោក សុវណ្ណ លោកស្រី សុត ចំណាន

លោក មាស ជុតិមា

បានទទួលការអនុញ្ញាតឱ្យបោះពុម្ពផ្សាយពី **ក្រសួងអប់រំ យុវជន និងកីឡា** តាមប្រកាសលេខ១៨៣៩ អយក.ប្រក. ចុះថ្ងៃទី២១ ខែឧសភា ឆ្នាំ២០០៩ ដើម្បីប្រើប្រាស់នៅតាមសាលារៀន ។



**គ្រឹះស្ថានបោះពុម្ពនិងចែកផ្សាយ**

បោះពុម្ពលើកទី១៣ ឆ្នាំ២០២០ ចំនួន១២០ ០០០ច្បាប់

ISBN 9-789-995-000-783

# អារម្ភកថា

សួស្តីប្អូនៗ កុមារា កុមារីទាំងអស់ជាទីស្នេហា !

សៀវភៅ “**វិទ្យាសាស្ត្រ- សិក្សាសង្គម**” ថ្នាក់ទី៣នេះមានបង្ហាញខ្លឹមសារសំខាន់ៗដែលមានទំនាក់ទំនងគ្នាក្នុងមុខវិជ្ជាវិទ្យាសាស្ត្រនិងសិក្សាសង្គម ។ ខ្លឹមសារទាំងអស់ត្រូវបានជ្រើសរើសយ៉ាងសម្រិតសម្រាំង ដើម្បីជួយប្អូនៗក្នុងការអភិវឌ្ឍចំណេះដឹង បំណិន និងឥរិយាបថ ព្រមទាំងសម្របសម្រួលទៅតាមកម្រិតយល់ដឹងរបស់ប្អូនៗថែមទៀតផង ។

សៀវភៅនេះសម្បូរទៅដោយរូបភាពដែលបង្កប់ខ្លឹមសារ ពាក្យទូន្មាន ព័ត៌មានផ្សេងៗ ដែលអាចធ្វើឱ្យប្អូនៗងាយសិក្សានិងស្វ័យសិក្សា ព្រោះតាមរយៈសៀវភៅនេះប្អូនៗអាចធ្វើលំហាត់ រៀនសង្កេត ពណ៌នា ចែកថ្នាក់ ស្រាវជ្រាវ និងវិភាគខ្លឹមសារមេរៀនដោយខ្លួនឯង ។

គណៈកម្មការនិពន្ធសង្ឃឹមថា សៀវភៅ “**វិទ្យាសាស្ត្រ- សិក្សាសង្គម**” ថ្នាក់ទី៣នេះជាសៀវភៅអប់រំបែបទំនើប ដែលអាចធ្វើឱ្យសតិបញ្ញារបស់ប្អូនៗ លូតលាស់រីកចម្រើនតាមសម័យកាលនៃសតវត្សរ៍ ។

សូមឱ្យការសិក្សារបស់ប្អូនៗមានការអភិវឌ្ឍល្អប្រសើរជាលំដាប់ !

គណៈកម្មការនិពន្ធ

# បញ្ជីអត្ថបទ

ទំព័រ

ជំពូកទី

# ១ ការរស់នៅប្រកបដោយអនាម័យ

យើងទាំងអស់គ្នាត្រូវមានសុខភាពល្អ ។ ដើម្បីមានសុខភាពល្អ យើងត្រូវរស់នៅប្រកបដោយអនាម័យ ។ ក្នុងជំពូកនេះ យើងនឹងសិក្សាអំពី



មេរៀនទី

# 1 ការសម្អាតខ្លួនប្រាណ

ក. តើភ្នែក ច្រមុះ មាត់ ត្រចៀក និងស្បែកមានមុខងារអ្វីខ្លះ?













ភ្នែកខ្ញុំអាចមើលឃើញឆ្ងាយជិត
ច្រមុះហិតសព្វក្លិនសាយភាយ
រីមាត់ខ្ញុំញ៉ាំនិងនិយាយ
ច្រៀងលេងសប្បាយផុតកង្វល់ ។
ត្រចៀកខ្ញុំជាអ្នកចាំស្តាប់
ត្រងត្រាប់យកពាក្យពេចន៍ទាំងឡាយ
ឱវាទល្អៗ ពីអ្នកម្តាយ
ប៉ាម៉ាក់តាយាយផុតអំពល់ ។
អណ្តាតខ្ញុំឱ្យដឹងរសជាតិ
ស្បែកមិនឃ្លាតដឹងក្តៅរងា
ការពារកាយដណ្តប់អង្គា
នាំក្តីសុខជាប្រពៃហោង ។

## ខ. តើយើងថែរក្សានិងសម្អាតផ្នែកផ្សេងៗនៃរាងកាយ ដូចម្ដេចខ្លះ?



### ១. យើងត្រូវថែរក្សាភ្នែកដោយ

- អានសៀវភៅក្រោមពន្លឺគ្រប់គ្រាន់
- ជូតភ្នែកនឹងកន្សែងស្អាត
- មិនយកវត្ថុ ឬ ដៃកខ្វក់ទៅប៉ះភ្នែក
- មិនលុបមុខ ឬ ងូតទឹកកខ្វក់ ។

### ២. យើងត្រូវថែរក្សាច្រមុះដោយ

- ប្រើកន្សែងទន់ស្អាតជូតច្រមុះ ពេលមានសំបោរ
- ខ្ទប់ច្រមុះនឹងកន្សែង ពេលដើរកាត់កន្លែងកខ្វក់ ឬ មានធូលី
- មិនប្រើវត្ថុរឹងរុករន្ធច្រមុះ ។





### ៣. យើងត្រូវថែរក្សាត្រចៀកដោយ

- លាង ឬ ជូតត្រចៀកឱ្យស្អាតជានិច្ច
- ការពារត្រចៀកកុំឱ្យសត្វល្អិត ឬ ទឹកចូល
- មិនប្រើវត្ថុរឹង ឬ ម្រាមដៃរុកត្រចៀក
- មិនស្ដាប់សំឡេងលាន់រំពងខ្លាំង ។
- ខ្ទប់ត្រចៀក ឬ ចៀសចេញពីកន្លែងមានសំឡេងលាន់រំពងខ្លាំង ។

## ៤. យើងត្រូវថែរក្សានិងសម្អាតមាត់ធ្មេញដោយ



- ខ្ពុរមាត់និងសម្អាតធ្មេញពេលក្រោកពីដំណេក និងក្រោយពេលបរិភោគអាហាររួច
- មិនបរិភោគអាហារត្រជាក់ពេក ឬ ក្ដៅពេក និងមិនខាំរបស់រឹង ។

## ៥. យើងត្រូវថែរក្សានិងសម្អាតខ្លួនប្រាណដោយ

- ប្រើសាប៊ូនិងទឹកស្អាតសម្រាប់លាងខ្លួន
- ជូតខ្លួននឹងកន្សែង ឬ ក្រមាស្អាត
- លាងដៃជានិច្ចមុននិងក្រោយពេលបរិភោគ ឬ ក្រោយពេលចេញពីបង្គន់
- ស្លៀកពាក់ស្អាតជានិច្ច
- ងូតទឹកពីរដងយ៉ាងតិចក្នុងមួយថ្ងៃ ។







អនុវត្តន៍អនាម័យល្អនិងទៀងទាត់ទើបមានសុខភាពល្អមាំមួន ។



ការសម្អាតខ្លួនប្រាណជួយឱ្យរាងកាយមានសុខភាពល្អ ។ រាងកាយមានសុខភាពល្អធ្វើឱ្យជីវិតស្រស់ថ្លា គ្រួសារមានសុភមង្គល ។



**ចូរសង្កេតរូបភាពខាងក្រោម រួចសរសេរបង្ហាញពីរបៀបដុសធ្មេញដើម្បីកុំឱ្យអាហារជាប់នឹងធ្មេញ ។**



..........................................................

..........................................................

..........................................................



..........................................................

..........................................................

..........................................................



..........................................................

..........................................................

..........................................................

មេរៀនទី

2

# ការបង្ការខ្លួនពីជំងឺផ្សេងៗ

កុមារងាយឆ្លងជំងឺណាស់ ។ ជំងឺអាចបង្អាក់ការលូតលាស់របស់កុមារ ។

ក. តើកុមារច្រើនកើតជំងឺអ្វីខ្លះ?

កុមារច្រើនកើតជំងឺ


ដង្កូវពោះវៀន


ក្អកមាន់


កញ្ជ្រឹល


ផ្តាសាយ



ជំងឺទាំងនេះមានលក្ខណៈឆ្លង រោគសញ្ញា វិធីបង្ការ និងវិធីព្យាបាលខុសៗគ្នា ។

| ប្រភេទជំងឺ | មូលហេតុ | រោគសញ្ញា | វិធីបង្ការ | វិធីព្យាបាល |
| --- | --- | --- | --- | --- |
| **ផ្ដាសាយ** | - ត្រូវទឹកភ្លៀងច្រើន<br>- អាកាសធាតុប្រែប្រួលខ្លាំង<br>- ឆ្លងពីអ្នកកើតជំងឺផ្ដាសាយ | - ហៀរសម្បោរថ្លា<br>- កណ្ដាស់<br>- ឈឺក្បាល<br>- ក្ដៅខ្លួន ... | - កុំផឹកទឹកកក<br>- កុំស្និទ្ធឬប្រើរបស់រួមគ្នាជាមួយអ្នកកើតជំងឺផ្ដាសាយ<br>- ពាក់ម៉ាស់ការពារជំងឺផ្ដាសាយគ្រប់ប្រភេទ | - សម្រាកគ្រប់គ្រាន់<br>- ផឹកទឹកក្ដៅឧណ្ហៗ<br>- មិននៅកន្លែងត្រជាក់<br>- ឱ្យគ្រូពេទ្យពិនិត្យនិងព្យាបាល |
| **ក្អកមាន់** | - ឆ្លងពីអ្នកកើតជំងឺក្អកមាន់ | - គ្រុនក្ដៅ<br>- ក្អកម្ដងៗជាប់គ្នាយ៉ាងយូរ | - ចៀសវាងនិយាយបែរមុខចំអ្នកជំងឺ | - ឱ្យគ្រូពេទ្យពិនិត្យនិងព្យាបាល |
| **ដង្កូវពោះវៀន** | - បរិភោគអាហារមិនស្អាតឬមិនឆ្អិនល្អ<br>- កាន់ចំណីដោយមិនបានលាងដៃ | - ពោះធំ<br>- បរិភោគច្រើនតែស្គមស្លេកស្លាំង | - បរិភោគអាហារស្អាត<br>- លាងដៃមុនពេលកាន់ចំណីអាហារ | - ទៅជួបគ្រូពេទ្យជាបន្ទាន់<br>- គោរពតាមវេជ្ជបញ្ជាឱ្យបានត្រឹមត្រូវ |
| **កញ្ជ្រឹល** | - ឆ្លងពីអ្នកកើតជំងឺកញ្ជ្រឹលតាមទឹកមាត់<br>- ប្រើប្រាស់របស់រួមគ្នាជាមួយអ្នកកើតជំងឺកញ្ជ្រឹល | - គ្រុនក្ដៅក្អកខះៗ<br>- ហៀរសម្បោរ មុខក្រហម ហៀរទឹកភ្នែក<br>- មានស្នាមអុចៗពណ៌សលើអណ្ដាត<br>- ៣ឬ៤ថ្ងៃក្រោយមកមានស្នាមកន្ទួលលើមុខហើយរាលដាលពេញទាំងខ្លួន | - ចៀសវាងនិយាយបែរមុខចំអ្នកមានជំងឺកញ្ជ្រឹល<br>- មិនប្រើរបស់រួមជាមួយអ្នកកើតជំងឺ | - ឱ្យគ្រូពេទ្យព្យាបាល<br>- គោរពតាមវេជ្ជបញ្ជា<br>- សម្រាកឱ្យបានច្រើននៅកន្លែងមានខ្យល់អាកាសបរិសុទ្ធ |

ពេលមានជំងឺ យើងគប្បីទៅមន្ទីរពេទ្យភ្លាម ។

## ២. តើនៅមន្ទីរពេទ្យគ្រូពេទ្យធ្វើអ្វីខ្លះ?

ពេលមានជំងឺ យើងត្រូវទៅមន្ទីរពេទ្យ ឬ ពេទ្យបង្អែក ឬ មណ្ឌលសុខភាពក្នុងសហគមន៍ ដើម្បីឱ្យគ្រូពេទ្យ

- វិភាគ ឬ ពិនិត្យជំងឺ
- ផ្ដល់ការណែនាំ
- ព្យាបាល
- ផ្ដល់ថ្នាំ ... ។










➢ មានជំងឺច្រើនប្រភេទណាស់ដែលកើតចំពោះកុមារនិងបង្អាក់ការលូតលាស់ ។

➢ ពេលមានជំងឺ កុមារគប្បីទៅឱ្យគ្រូពេទ្យពិនិត្យជាបន្ទាន់ ហើយត្រូវធ្វើតាមវេជ្ជបញ្ជាឱ្យបានត្រឹមត្រូវ ។



**១. ចូរគូសរង្វង់ជុំវិញអក្សរមួយដែលជាចម្លើយត្រឹមត្រូវ ។**

- បណ្ដាជំងឺខាងក្រោមនេះ តើជំងឺណាច្រើនកើតចំពោះកុមារ?

  ក. ទឹកនោមផ្អែម ខ. លើសឈាម គ. ដង្កូវពោះវៀន

- បណ្ដាជំងឺខាងក្រោមនេះ តើជំងឺណាដែលធ្វើឱ្យហៀរសំបោរក្អកកណ្ដាស់?

  ក. កញ្ជ្រឹល ខ. ផ្ដាសាយ គ. ក្អកមាន់

**២. ចូរគូសបង្ហាញទីតាំងមណ្ឌលសុខភាពក្នុងសហគមន៍ដែលនៅជិតផ្ទះរបស់អ្នក ។**

**៣. ចូរជ្រើសរើសពាក្យក្នុងប្រអប់ដើម្បីបំពេញល្បះខាងក្រោមឱ្យមានន័យត្រឹមត្រូវ ។**

| | | | | |
|---|---|---|---|---|
| មន្ទីរពេទ្យ ឬពេទ្យបង្អែក | ថ្នាំ | ផឹក | ការណែនាំ | ពិនិត្យ |

ពេលមានជំងឺ យើងត្រូវទៅ ............. ដើម្បីឱ្យគ្រូពេទ្យ ............... ផ្ដល់ ................... និងផ្ដល់ ............. សម្រាប់លេប ឬ .............. ។

មេរៀនទី

# 3 ចំណីអាហារស្អាត

ក. តើការបរិភោគចំណីអាហារដែលមានអនាម័យល្អអាចផ្តល់ផល ប្រយោជន៍ដូចម្តេចខ្លះ?

យើងមានចំណីអាហារច្រើនបែបណាស់សម្រាប់បរិភោគ ។ ចំណីអាហារមានអនាម័យល្អអាចឱ្យយើងមាន






ការបរិភោគចំណីអាហារមានអនាម័យ ធ្វើឱ្យមានសុខភាពល្អ ។

២. តើយើងត្រូវធ្វើដូចម្ដេចខ្លះ ដើម្បីឱ្យចំណីអាហារមាន អនាម័យល្អ?

ដើម្បីឱ្យចំណីអាហារ
មានអនាម័យល្អយើងត្រូវ








លាងសាច់បន្លែផ្លែឈើឱ្យស្អាត




ចម្អិនឱ្យឆ្អិនល្អ




ទុកដាក់ឱ្យបានត្រឹមត្រូវ




លាងដៃឱ្យស្អាតមុនចាប់កាន់ ឬ បរិភោគ

អាហារដែលយើងយកមកបរិភោគត្រូវស្អាតជានិច្ច។

គ. តើទឹកស្អាតមានសារៈសំខាន់អ្វីខ្លះ? ដើម្បីបានទឹកស្អាតតើយើងត្រូវធ្វើដូចម្ដេចខ្លះ?



មនុស្សអាចអត់អាហារបានយូរថ្ងៃទើបស្លាប់ ប៉ុន្តែគេអត់ទឹកបានត្រឹមតែបីថ្ងៃប៉ុណ្ណោះ ។ យើងត្រូវផឹកស្អាតជានិច្ចដោយត្រូវ






- ដាំទឹកឱ្យពុះ
- ច្រោះទឹកឱ្យបានត្រឹមត្រូវ
- គ្របពាងទឹកឱ្យបានជិតល្អ
- ប្រើកែវ ផ្តិល ឬកាស្អាតដើម្បីដួសទឹក ។







ទឹកស្អាតធ្វើឱ្យមនុស្សមានសុខភាពល្អនិងលូតលាស់ធំធាត់ ។



យើងត្រូវការចំណីអាហារស្អាតនិងទឹកស្អាត ដើម្បីឱ្យរាងកាយយើងលូតលាស់ល្អ មានបញ្ញា មានកម្លាំងមាំមួន និងឈ្នះជំងឺផ្សេងៗ ។



**ចូរសង្កេតរូបភាពទាំងនេះ រួចបំពេញល្បះខាងក្រោមឱ្យមានន័យត្រឹមត្រូវ ។**



ការបរិភោគចំណីអាហារស្អាតនិងទឹក ..................... នាំឱ្យយើងមាន .............. ។ រុយ ................ និង ................ ជាសត្វ ................. មេរោគ ។ ដើម្បីឱ្យមានសុខភាពល្អ យើងត្រូវទុកដាក់ ........................ ឱ្យបានត្រឹមត្រូវនិងត្រូវ .................. ទឹកឱ្យពុះល្អ ។

មេរៀនទី

# 4 ការទទួលស្គាល់អំពើល្អ

## ក. អំពើល្អរបស់មិត្តខ្ញុំ

### ១. ពេលរៀនសូត្រ




យើងត្រូវចេះទទួលស្គាល់នូវភាពប៉ិនប្រសប់និងអំពើល្អរបស់មិត្តយើង ។

## ២. ពេលនៅផ្ទះ




យើងមិនត្រូវទុកពេលវេលាឱ្យកន្លងទៅដោយឥតប្រយោជន៍ឡើយ ។

## ៣. នៅទីសាធារណៈ




យើងត្រូវចេះគោរពនិងដឹងទុក្ខធុរៈគ្នា ។

## ២. អ្នកដែលខ្ញុំស្ងើចសរសើរ



ហេតុអ្វីបានជាពូម៉ុកមានជីវភាពធូរធារ បើគ្រាន់តែគាត់ធ្វើជាងចម្លាក់ប៉ុណ្ណោះ?

ពូម៉ុកជាជាងចម្លាក់ថ្មយ៉ាងជំនាញម្នាក់ ។ រាល់ស្នាដៃរបស់គាត់ធ្វើឱ្យភ្ញៀវពេញចិត្តនិងកោតសរសើរជានិច្ច ។ ដោយសារភាពប៉ិនប្រសប់នេះហើយទើបឥឡូវនេះគ្រួសារគាត់មានជីវភាពធូរធារ ។





ចេះធ្វើអ្វីមួយប្រាកដ នោះប្រាក់រត់តាមហៅ ។



យើងត្រូវទទួលស្គាល់អំពើល្អរបស់អ្នកដទៃនិងត្រូវយកតម្រាប់តាមអ្នកដែលធ្វើអំពើល្អនិងអ្នកមានស្នាដៃល្អ ។ បើយើងមានចំណេះដឹងប៉ិនប្រសប់ និងប្រព្រឹត្តល្អ នោះជីវិតយើងនឹងរុងរឿង ។



**១. ចូរអ្នកប្រាប់ពីអំពើល្អរបស់នរណាម្នាក់ ។**

ក. នៅពេលជិះរថយន្ត

ខ. នៅពេលចូលវត្ត

គ. នៅពេលចូលមើលល្ខោន ឬ ភាពយន្ត

**២. ចូរឆ្លើយសំណួរខាងក្រោម ។**

ក. តើការធ្វើអំពើល្អ អាចឱ្យយើងទទួលផលដូចម្ដេច ?

ខ. តើការប្រមាថមើលងាយគេ អាចឱ្យយើងទទួលផលដូចម្ដេចខ្លះ ?

គ. តើគំរូល្អអ្វីខ្លះដែលប្អូនគប្បីយកមកអនុវត្ត ? ព្រោះអ្វី ?

មេរៀនទី

5

# សណ្ដាប់ធ្នាប់ល្អ

## ក. កិច្ចការរបស់សិស្ស

- តើសិស្សម្នាក់ៗត្រូវធ្វើអ្វីខ្លះនៅក្នុងថ្នាក់រៀន ?




យើងត្រូវរៀបចំថ្នាក់រៀនឱ្យមានរបៀបរៀបរយនិងខិតខំស្ដាប់ការណែនាំរបស់គ្រូ ដើម្បីឱ្យក្លាយទៅជាសិស្សល្អ ។

## ខ. របៀបធ្វើកិច្ចការដើម្បីបានជោគជ័យ

- តើយើងត្រូវធ្វើដូចម្ដេចដើម្បីឱ្យការរៀនសូត្រទទួលបានលទ្ធផលល្អ ?




យើងត្រូវចេះពិភាក្សាគ្នា ជួយគ្នា និងរៀបចំសកម្មភាពតាមលំដាប់លំដោយឱ្យបានត្រឹមត្រូវតាមកិច្ចការនីមួយៗ ទើបយើងអាចសម្រេចជោគជ័យក្នុងការងារ ។



មុនពេលធ្វើអ្វីមួយ យើងត្រូវគិតទុកជាមុននូវរាល់សកម្មភាពដែលត្រូវអនុវត្ត ដូចពាក្យចាស់ពោលថា “**ត្រូវគិតរួចសិនសឹមគួរ**” ទើបកិច្ចការទទួលបានជោគជ័យតាមបំណងប្រាថ្នា ។



**ដើម្បីដាំបាយតើអ្នកត្រូវធ្វើសកម្មភាពតាមលំដាប់លំដោយអ្វីខ្លះ ?**



ជំពូកទី

# ២ ទម្លាប់រស់នៅល្អក្នុងសហគមន៍

មនុស្សគ្រប់រូបចង់រស់នៅប្រកបដោយសេចក្ដីសុខ មានការស្រឡាញ់រាប់អានគ្នាមិនចង់ជួបប្រទះរឿងអាក្រក់ឡើយ ។ ក្នុងជំពូកនេះយើងនឹងសិក្សាអំពី



មេរៀនទី

# 1 ការស្រឡាញ់រាប់អានគ្នា

## ក. សីលធម៌

• យើងធ្វើអំពើល្អទើបហៅថាមានសីលធម៌ល្អ












ការគោរពចាស់ព្រឹទ្ធាចារ្យ ការបម្រើជីដូនជីតា ការជួយយកអាសាគ្នា ការចេះស្រឡាញ់រាប់អានគ្នា ... គឺជាសីលធម៌ល្អ ។

## ខ. យើងត្រូវគោរពច្បាប់មួយចំនួន







យើងត្រូវគោរពច្បាប់ ដើម្បីសេចក្ដីសុខ សុវត្ថិភាព និងផលប្រយោជន៍របស់យើងទាំងអស់គ្នា ។

## គ. យើងត្រូវមានសីលធម៌ល្អនៅក្នុងការរស់នៅ




គ្រួសារសុខសាន្ត សាលារៀនល្អ ប្រទេសជាតិមានសន្តិភាព ដោយសារយើងទាំងអស់គ្នាចេះគោរពច្បាប់របស់ប្រទេសជាតិ ។



ការប្រព្រឹត្តិនូវសីលធម៌ល្អដូចជា ការជួយគ្នាក្នុងគ្រាមានអាសន្ន ការរាប់អានគ្នា ការគោរពច្បាប់ ... អាចធ្វើឱ្យប្រទេសជាតិទទួលបានសេចក្តីសុខ សន្តិភាព និងចំរុងចំរើនរុងរឿង ។



**១. ចូរឆ្លើយសំណួរខាងក្រោម ។**

ក. អ្នកជាសិស្ស តើអ្នកអាចជួយមិត្តភក្តិដូចម្តេចខ្លះ ?

ខ. តើអ្នកត្រូវធ្វើដូចម្តេចខ្លះ ប្រសិនបើមិត្តភក្តិអ្នកមានទុក្ខ ?

គ. តើមូលហេតុអ្វីបានជាយើងត្រូវគោរពច្បាប់ ?

**២. ចូរគូសរង្វង់ជុំវិញអក្សរណាដែលជាចម្លើយត្រឹមត្រូវ ។**

- បណ្តាសកម្មភាពខាងក្រោម តើសកម្មភាពណាជាសកម្មភាពល្អ ?

ក. ដើរលេងផ្តេសផ្តាស

ខ. ទៅសួរសុខទុក្ខមិត្តភក្តិឈឺ

គ. ទៅមើលគេឈ្លោះគ្នា

- ការគោរពច្បាប់និងវិន័យអាចធ្វើឱ្យយើង

ក. ជួបការលំបាក

ខ. បានសុខសប្បាយ

គ. គ្មានសេរីភាព

មេរៀនទី

# 2 ការយកចិត្តទុកដាក់ចំពោះអ្នកនៅជុំវិញ

## ក. ទ្រព្យសម្បត្តិអ្នកដទៃ

- នៅពេលរើសបានទ្រព្យសម្បត្តិអ្វីមួយរបស់អ្នកដទៃ តើយើងត្រូវធ្វើដូចម្ដេចខ្លះ ?




“ យើងមិនត្រូវចង់បានទ្រព្យសម្បត្តិអ្នកដទៃទេ ” ។ នៅពេលរើសបានទ្រព្យសម្បត្តិអ្នកដទៃ យើងត្រូវប្រគល់វាឱ្យទៅម្ចាស់គេវិញ ។

## ២. មិនយកទ្រព្យសម្បត្តិអ្នកដទៃដែលយើងរើសបាន



ហេតុអ្វីយើងមិនត្រូវយកទ្រព្យសម្បត្តិរបស់អ្នកដទៃដែលយើងរើសបាន ?

យើងមិនត្រូវយកទ្រព្យសម្បត្តិរបស់អ្នកដទៃដែលគេភ្លេច ឬ ជ្រុះ ពីព្រោះ ...

យើងស្រឡាញ់ទ្រព្យសម្បត្តិរបស់យើង គេក៏ស្រឡាញ់ទ្រព្យសម្បត្តិរបស់គេដែរ ។



យើងស្តាយទ្រព្យសម្បត្តិរបស់យើង គេក៏ស្តាយទ្រព្យសម្បត្តិរបស់គេដែរ ។

យើងត្រូវចំណាយលុយច្រើនសម្រាប់ទិញសម្ភារៈប្រើប្រាស់ទាំងនេះ គេក៏ចំណាយលុយទិញដូចយើងដែរ ។

យើងមិនត្រូវយកទ្រព្យសម្បត្តិអ្នកដទៃធ្វើជាទ្រព្យសម្បត្តិផ្ទាល់ខ្លួនទេ ។ យើងត្រូវប្រកាន់គំនិតបែបនេះទើបក្លាយជាមនុស្សល្អ ។

## គ. ការថែរក្សាទ្រព្យសម្បត្តិសាធារណៈ

- តើអ្វីខ្លះជាទ្រព្យសម្បត្តិសាធារណៈ ? ហេតុអ្វីបានជាយើងត្រូវថែរក្សាទ្រព្យសម្បត្តិសាធារណៈ ?



សម្បត្តិសាធារណៈមានច្រើនណាស់ ដូចជា សាលារៀន មន្ទីរពេទ្យ ផ្លូវថ្នល់ សួនច្បារ .. ។ យើងទាំងអស់គ្នាត្រូវជួយថែរក្សាសម្បត្តិទាំងនេះឱ្យបានល្អជានិច្ច ព្រោះ ៖



| | |
|---|---|
|  | សាលារៀនជាកន្លែងផ្តល់ចំណេះដឹង ចំណេះធ្វើ ឥរិយាបថល្អ និងធ្វើឱ្យយើងចេះរស់នៅជាមួយគ្នា ។ |
|  | មន្ទីរពេទ្យជាកន្លែងសម្រាប់គ្រូពេទ្យធ្វើការព្យាបាលឱ្យយើងគ្រប់គ្នា ។ |
|  | សួនច្បារជាកន្លែងសម្រាប់លម្អនិងសម្រាប់ឱ្យយើងគ្រប់គ្នាដើរលេងកម្សាន្ត ។ |

ទ្រព្យសម្បត្តិសាធារណៈសុទ្ធតែផ្តល់ផលប្រយោជន៍យ៉ាងច្រើនដល់យើងគ្រប់គ្នា ដូចនេះយើងទាំងអស់គ្នាត្រូវតែចូលរួមថែរក្សាទ្រព្យសម្បត្តិទាំងនេះឱ្យដូចទ្រព្យសម្បត្តិផ្ទាល់របស់យើងដែរ ។



យើងមិនត្រូវចង់បានទ្រព្យសម្បត្តិអ្នកដទៃទេ ។ យើងប្រកាន់គំនិតបែបនេះទើបក្លាយជាមនុស្សល្អ ។ យើងត្រូវចូលរួមថែរក្សាទ្រព្យសម្បត្តិសាធារណៈឱ្យដូចការថែរក្សាទ្រព្យសម្បត្តិផ្ទាល់ខ្លួនយើងដែរ ។



**១. ចូរគូសរង្វង់ជុំវិញអក្សរណាដែលជាចម្លើយត្រឹមត្រូវ ។**

- បណ្ដាសម្ភារៈខាងក្រោមនេះ តើសម្ភារៈណាមួយជាសម្ភារៈផ្ទាល់ខ្លួន ?

  **ក.** ក្ដារខៀន **ខ.** កាបូប **គ.** បន្ទប់រៀន

- បណ្ដាសម្ភារៈខាងក្រោមនេះ តើសម្ភារៈណាមួយជាសម្ភារៈសាធារណៈ ?

  **ក.** ផ្ទះ **ខ.** ផ្លូវ **គ.** គោ

**២. ចូរឆ្លើយសំណួរខាងក្រោម ។**

**ក.** ហេតុអ្វីបានជាយើងមិនត្រូវយកទ្រព្យសម្បត្តិដែលរើសបាន?

**ខ.** ហេតុអ្វីបានជាយើងត្រូវថែរក្សាទ្រព្យសម្បត្តិសាធារណៈ ?

**គ.** ដើម្បីចូលរួមថែរក្សាសាលារៀន តើអ្នកត្រូវធ្វើដូចម្ដេចខ្លះ ?

មេរៀនទី

# 3 ការរក្សាសុវត្ថិភាពពេលធ្វើដំណើរតាមផ្លូវ

## ក. ឥរិយាបថប្រកបដោយសុវត្ថិភាពរបស់អ្នកដំណើរ



កូនខ្មែរគ្រប់ប្រាណចូរចងចាំ
ទោះជិះ ឬ ដើរទៅឋានណា
ភ្លើងលឿងសញ្ញាប្រុងប្រយ័ត្ន
ភ្លើងបៃតងជាក់ត្រូវចំណាំ
យើងត្រូវពាក់មួកក្បាលការពារ
បើធ្វេសប្រហែសទ្រព្យបង់បាត់
ឥរិយាបថល្អផ្ដល់ក្ដីសុខ
ចាត់ទុករូបគេដូចរូបឯង

បុរាណបានផ្ដាំតាមតម្រា
រៀងរាល់រូបាប្រកាន់ស្ដាំ ។
ក្រហមម៉ឺងម៉ាត់បញ្ឈប់ចាំ
ចេញចរឆ្វេងស្ដាំតាមចំណាត់ ។
គ្រោះថ្នាក់នានាអាចទប់ស្កាត់
ប្រយ័ត្ននោះពិតផុតចំបែង ។
កុំបើកបរបុកប៉ះគេឯង
ចូរកូនថ្លឹងថ្លែងកុំបីភ្លេច ។

## ២. សារៈសំខាន់នៃការពាក់មួកសុវត្ថិភាព

តើការពាក់មួកចម្តានិងពាក់មួកសុវត្ថិភាព មានប្រយោជន៍ខុសគ្នាដូចម្តេចខ្លះ?





ការពាក់មួកចម្តានិងពាក់មួកសុវត្ថិភាពមានការខុសគ្នា៖

យើងពាក់មួកចម្តាដើម្បីការពារកម្តៅនិងពន្លឺព្រះអាទិត្យ ... ។





យើងពាក់មួកសុវត្ថិភាពដើម្បីការពារក្បាលនៅពេលមានគ្រោះថ្នាក់ចរាចរណ៍ ហើយវាក៏អាចការពារកម្តៅនិងធូលីហុយ ... ។

## គ. សារៈសំខាន់នៃគំនូសចរាចរណ៍លើទ្រូងផ្លូវ





តើនៅលើទ្រូងផ្លូវមានគំនូសចរាចរណ៍ដូចម្ដេចខ្លះ? តើគំនូសទាំងនោះសម្រាប់ធ្វើអ្វីខ្លះ?

នៅលើទ្រូងផ្លូវមានគំនូសចរាចរណ៍៤ បែប ។ គំនូសទាំងនោះជាសញ្ញាប្រាប់ឱ្យដឹងពី ៖




១. ជាគំនូសកាត់ ឬ ពុះទ្រូងផ្លូវជាពីរផ្នែក ដើម្បីបែងចែកចរាចរណ៍ដែលមានទិសផ្ទុយគ្នា ។

២. ជាគំនូសកាត់ ឬ ពុះពាក់កណ្ដាលទ្រូងផ្លូវ ដើម្បីបែងចែកចរាចរណ៍ដែលមានទិសដូចគ្នាជាពីរ (អែបស្ដាំ ឬ អែបចិញ្ចើមផ្លូវសម្រាប់ម៉ូតូ ឬ កង់និងអែបឆ្វេង ឬ គំនូសពុះទ្រូងផ្លូវសម្រាប់រថយន្តបើកបរ) ។

៣. គំនូសពណ៌សអង្កន់កាត់ទទឹងទ្រូងផ្លូវ សម្រាប់ថ្មើរជើងដើរឆ្លងផ្លូវ ។

៤. គំនូសពណ៌សអង្កន់កាត់ទទឹងទ្រូងផ្លូវ មិនរាបស្មើជាសញ្ញាប្រាប់ឱ្យដឹងថានៅខាងមុខមានចរាចរណ៍ចង្អៀត ដូចនេះត្រូវបន្ថយល្បឿន ។



ដើម្បីរក្សាសុវត្ថិភាពក្នុងពេលធ្វើដំណើរ យើងត្រូវគោរពច្បាប់ចរាចរណ៍ ។ អ្នកជិះកង់ ឬ ម៉ូតូត្រូវពាក់មួកសុវត្ថិភាពរាល់ពេលធ្វើដំណើរ ។ ការពាក់មួកសុវត្ថិភាពអាចជួយការពារក្បាលមិនឱ្យប៉ះទង្គិចខ្លាំងនៅពេលមានគ្រោះថ្នាក់ ។



**ចូរសង្កេតរូបភាពទាំងនេះ ដើម្បីបំពេញល្បះខាងក្រោមឱ្យមានន័យត្រឹមត្រូវ ។**





- ដើម្បីសុវត្ថិភាព អ្នក .........
ត្រូវធ្វើ ................... តាម
គំនូស ................... ផ្លូវ ។

- ពេលធ្វើ ........................
តាម ............ ឬ ម៉ូតូយើង
ត្រូវពាក់ .........................
ដើម្បីការពារ .................
មិនឱ្យប៉ះទង្គិចខ្លាំងនៅពេល
ដួល ។

មេរៀនទី

# 4 ការរក្សាសុវត្ថិភាពនៅក្នុងតំបន់មានមីន

## ក. គ្រោះថ្នាក់ផ្សេងៗដោយសារមីន



តើមីនអាចបង្កគ្រោះថ្នាក់អ្វីខ្លះដល់យើង?

មីនអាចបង្កឱ្យយើងពិការដៃ ជើង និងរហូតដល់បាត់បង់ជីវិត ។









## ខ. សញ្ញាសម្គាល់មីន



ក្នុងតំបន់មានមីននៅពេលធ្វើដំណើរ ប្រសិនបើយើងឃើញសញ្ញាដូចខាងក្រោមនេះ យើងត្រូវចៀសចេញឱ្យឆ្ងាយ ។







## គ. សារៈសំខាន់របស់សញ្ញាសម្គាល់មីន




ដូចនេះសញ្ញាសម្គាល់មីនអាចធ្វើឱ្យយើង ដឹងពីកន្លែងមានមីននិងចៀសផុតពីពិការភាព ឬ សេចក្តីស្លាប់បាន ។

## ឃ. ឥរិយាបថល្អក្នុងតំបន់មានមីន




ការចូលរួមថែរក្សាសញ្ញាសម្គាល់មីនជាអំពើមួយល្អប្រសើរព្រោះជាការធ្វើឱ្យមនុស្សសត្វមួយចំនួនចៀសផុតពីទុក្ខទោស ។



មីនអាចបង្កឱ្យមានគ្រោះថ្នាក់ណាស់ ។ ពេលធ្វើដំណើរយើងត្រូវចៀសឱ្យឆ្ងាយពីសញ្ញាសម្គាល់មីន ។ យើងត្រូវផ្សព្វផ្សាយឱ្យដឹងគ្រប់គ្នាអំពីទីតាំងដែលមានមីន ។ ការចូលរួមថែរក្សាសញ្ញាសម្គាល់មីនអាចជួយមនុស្សឱ្យចៀសផុតពីពិការភាព ឬ សេចក្ដីស្លាប់ ។



**ចូរជ្រើសរើសពាក្យក្នុងប្រអប់ យកទៅបំពេញល្បះខាងក្រោមដើម្បីឱ្យមានន័យត្រឹមត្រូវ ។**

| | | | |
|---|---|---|---|
| សញ្ញាក្បាលខ្មោច | សត្វ | រដ្ឋអំណាច | មីន |
| ទីតាំង | មនុស្ស | សញ្ញា | ព័ត៌មាន |

មីនអាចធ្វើឱ្យ .................និង .................. ពិការ ឬ ស្លាប់បាន ។ ពេលធ្វើដំណើរ យើងត្រូវសង្កេតមើល .................. សម្គាល់មីនដែលមានសញ្ញាឈើខ្វែង សញ្ញាក្មួចស្មៅ និង ................ ។ យើងត្រូវផ្ដល់ ........... ឬ រាយការណ៍ជាបន្ទាន់ពី ................... ដែលមានមីនជូន .................. ។

មេរៀនទី

# 5 ការចៀសវាងពីការតំរាមកំហែង

## ក. ចំណង់ចំណូលចិត្តរបស់កុមារ

- តើកុមារចូលចិត្តអ្វីខ្លះ ?



កុមារភាគច្រើនចូលចិត្តការសប្បាយ ចង់ដើរលេង ចង់បានវត្ថុផ្សេងៗ ចង់ញ៉ាំនំ ចង់ស្លៀកពាក់ខោអាវល្អៗ ។ ប្រសិនបើគេមិនឱ្យតាមចំណង់របស់គេទេនោះ ពួកគេនឹងយំ ។

## ខ. ល្បិចផ្សេងៗរបស់ជនខិលខូច




ជនខិលខូចមានល្បិចច្រើនបែបណាស់ក្នុងការធ្វើបាបកុមារ ។ ពួកគេតែង លួងលោមធ្វើជាឱ្យលុយចាយ ឱ្យជួយទិញអីវ៉ាន់ នាំជិះឡានដើរលេង ... ។

# គ. វិធីការពារខ្លួនរបស់កុមារ




មនុស្សអាក្រក់មានល្បិចកលច្រើនណាស់ ។ ដូចនេះយើងមិនត្រូវទុកចិត្តមនុស្សដែលយើងមិនធ្លាប់ស្គាល់ទេ ហើយក៏មិនត្រូវទៅណាតែម្នាក់ឯងដែរ ។



ថ្វីត្បិតតែយើងជាកុមារតែងចង់សប្បាយ ចង់ញ៉ាំ ចង់បាន ... ប៉ុន្តែ យើងមិនត្រូវជឿទុកចិត្តមនុស្សដែលយើងមិនធ្លាប់ស្គាល់ឡើយ ។ យើងមិនត្រូវលង់នឹងការលួងលោមរបស់អ្នកណាម្នាក់ ព្រោះជួនកាលវាជាល្បិចកលក៏មាន ។



**១. ចូរគូសវង់ជុំវិញអក្សរណាដែលជាចម្លើយត្រឹមត្រូវ ។**

- តើអ្នកត្រូវធ្វើដូចម្ដេចនៅពេលមានមនុស្សដែលអ្នកមិនធ្លាប់ស្គាល់មកបបួលអ្នកទៅដើរលេង ?

  ក. ស្រែកយំហើយកុំចេញទៅណា

  ខ. ប្រកែកថា “ទេ” ហើយរត់ទៅរកមិត្តភក្តិ

  គ. ដើរតាមមនុស្សដែលមិនធ្លាប់ស្គាល់នោះ

**២. ដើម្បីឱ្យដឹងពីចម្លើយដ៏ល្អមួយសម្រាប់ការពារខ្លួនពីការគំរាមកំហែង ចូរអ្នកគូសភ្ជាប់លេខតាមលំដាប់ដូចរូបខាងក្រោម :**



មេរៀនទី

# 6 ការទុកដាក់វត្ថុឱ្យមានសុវត្ថិភាព

## ក. សម្ភារៈប្រើប្រាស់នៅក្នុងផ្ទះ

- ចូររាប់ឈ្មោះវត្ថុដែលមាននៅក្នុងផ្ទះរបស់អ្នក ។

នៅក្នុងផ្ទះរបស់យើងមានសម្ភារៈប្រើប្រាស់ច្រើនណាស់ ។



សម្ភារៈនៅក្នុងផ្ទះរបស់យើង ខ្លះមានប្រយោជន៍និងខ្លះទៀតអាចបង្កឱ្យមានគ្រោះថ្នាក់ដូចជា មុត ពុល រលាក រអិលដួល ... ។

## ខ. ការបង្ការគ្រោះថ្នាក់

- តើយើងត្រូវរៀបចំវត្ថុប្រើប្រាស់ទាំងនោះដូចម្ដេចដើម្បីចៀសវាងគ្រោះថ្នាក់ ?

ដើម្បីចៀសវាងគ្រោះថ្នាក់ យើងត្រូវរៀបចំវត្ថុប្រើប្រាស់ទាំងអស់ឱ្យមានសណ្ដាប់ធ្នាប់ដូចជា ៖



- ទុកវត្ថុពុលឱ្យផុតពីដៃក្មេង
- ទុកឈើគូសនិងវត្ថុងាយឆេះឱ្យឆ្ងាយពីដៃក្មេង
- ត្រូវបិទ ឬ គ្របពាងទឹកឱ្យជិត
- ទុកកាំបិត ពូថៅនៅកន្លែងខ្ពស់ផុតពីដៃក្មេង
- ត្រូវពន្លត់ភ្លើងឱ្យបានត្រឹមត្រូវក្រោយពេលដាំស្ល រួច
- ពិនិត្យឈ្មោះថ្នាំឱ្យបានច្បាស់លាស់មុនយកទៅប្រើប្រាស់ ... ។

ការធ្វេសប្រហែសបណ្ដាលឱ្យមានមហន្តរាយ ឬ គ្រោះថ្នាក់ផ្សេងៗ ។ ការរៀបចំទុកដាក់វត្ថុប្រើប្រាស់ផ្សេងៗ ឱ្យមានរបៀបរៀបរយនាំមកនូវភាពសុខសាន្ត ។



ការរៀបចំសម្ភារៈប្រើប្រាស់ឱ្យមានសណ្តាប់ធ្នាប់ល្អ នាំមកនូវភាពសុខសាន្ត ។ បម្រុងប្រយ័ត្នអាចចៀសផុតពីគ្រោះថ្នាក់ផ្សេងៗ ។

**“ ការការពារប្រសើរជាងការព្យាបាល ។ ”**



**១. ចូររាប់គ្រោះថ្នាក់ទាំងឡាយដែលបណ្តាលមកពីការធ្វេសប្រហែសឥតសណ្តាប់ធ្នាប់នៅក្នុងផ្ទះបាយ ដោយសរសេរដាក់ក្នុងតារាងគំរូខាងក្រោម**

| ឈ្មោះសម្ភារៈ | គ្រោះថ្នាក់ |
|---|---|
| ១. ...................... | |
| ២. ...................... | |
| ៣. ...................... | |
| ៤. ...................... | |

**២. ចូរគូសរង្វង់ជុំវិញអក្សរណាដែលជាចម្លើយត្រឹមត្រូវ ។**

- បណ្តាវត្ថុរាវខាងក្រោមនេះ តើវត្ថុរាវណាមួយដែលជាថ្នាំសម្លាប់សត្វល្អិត ?

  **ក.** ទឹកភ្លៀង **ខ.** ទឹកត្រី **គ.** ទឹកខ្មេះ **ឃ.** ទឹកដេដេតេ ។

- បណ្តាវត្ថុរាវខាងក្រោមនេះ តើវត្ថុរាវណាមួយដែលងាយបង្កឱ្យមានអគ្គិភ័យ ។

  **ក.** ប្រេងឆា **ខ.** ទឹកសាប៊ូ **គ.** ទឹកថ្នាំលាបដំបៅ **ឃ.** ប្រេងសាំង ។

ជំពូកទី

# ៣ ការលូតលាស់នៃមនុស្ស សត្វ និងរុក្ខជាតិ

មនុស្ស សត្វ និងរុក្ខជាតិតែងតែមានការលូតលាស់និងប្រែប្រួល។ សត្វនិងរុក្ខជាតិផ្ដល់ប្រយោជន៍ជាច្រើនដល់មនុស្ស។ ក្នុងជំពូកនេះយើងនឹងសិក្សាអំពី



មេរៀនទី

# 1 បន្ទាត់ពេលវេលា

## ក. ដំណើរជីវិតរបស់ជីដូនខ្ញុំ

- តើជីដូនអ្នកមានដំណើរជីវិតដូចម្ដេចខ្លះ ?

លោកយាយ ! តើលោកយាយអាចប្រាប់ពីដំណើរជីវិតរបស់លោកយាយឱ្យចៅដឹងខ្លះៗបានឬទេ?





កាលយាយនៅពីតូច




កាលយាយចូលរៀន






កាលយាយនៅធ្វើការ តែបច្ចុប្បន្ននេះយាយបានឈប់សម្រាកពីការងារក្រសួងអប់រំហើយ



កាលយាយរស់នៅក្នុងរបបប៉ុលពត

មនុស្សយើងគ្រប់គ្នាតែងមានដំណើរជីវិតខុសៗគ្នាដោយឆ្លងកាត់ហេតុការណ៍ផ្សេងៗ ។

## ១. កាលបរិច្ឆេទសំខាន់ៗនៃដំណើរជីវិតរបស់ជីដូនខ្ញុំ



តើដំណើរជីវិតរបស់លោកយាយជួបនឹងព្រឹត្តិការណ៍សំខាន់ៗអ្វី ?



១. យាយបានកើតនៅឆ្នាំ ១៩៤៦ គឺជាឆ្នាំដែលប្រទេសកម្ពុជាស្ថិតនៅក្រោមអាណានិគមបារាំង ។

២. យាយបានចូលរៀននៅឆ្នាំ ១៩៥៣ គឺជាឆ្នាំដែលប្រទេសយើងបានទទួលឯករាជ្យបរិបូណ៌ ។

៣. យាយបានរៀនចប់កម្រិតមធ្យមសិក្សានៅឆ្នាំ ១៩៧០ គឺជាឆ្នាំដែលប្រទេសយើងប្តូររបបរាជានិយមទៅជាសាធារណរដ្ឋដោយរដ្ឋប្រហារ ១៨ មីនា ឆ្នាំ ១៩៧០ របស់លោក លន់ នល់ ។

៤. យាយបានធ្វើជាគ្រូបង្រៀននៅឆ្នាំ ១៩៧៥ គឺជាឆ្នាំដែលប្រទេសយើងធ្លាក់ក្នុងរបបកម្ពុជាប្រជាធិបតេយ្យ ។

៥. យាយបានរៀបការក្រោយថ្ងៃ ៧ មករា ឆ្នាំ ១៩៧៩ គឺជាឆ្នាំដែលប្រទេសយើងត្រូវបានរំដោះរួចពីអំពើប្រល័យពូជសាសន៍របស់ខ្មែរក្រហម ។

៦. យាយមានចៅនៅឆ្នាំ ១៩៩៧ ក្នុងអំឡុងប្រទេសយើងគ្រងរាជ្យដោយសម្តេចព្រះនរោត្តម សីហនុតាំងពីឆ្នាំ ១៩៩៣មក ។

៧. ចៅរបស់យាយបានចូលសាលារៀននៅឆ្នាំ ២០០៤ គឺជាឆ្នាំដែលប្រទេសយើងបានប្តូរអ្នកគ្រងរាជ្យថ្មី ពីសម្តេចព្រះនរោត្តម សីហនុ មកសម្តេចព្រះនរោត្តមសីហមុនីវិញ ។

## គ. ការប្រើប្រាស់បន្ទាត់ពេលវេលា



តើយើងត្រូវធ្វើដូចម្តេចដើម្បី
ងាយចងចាំព្រឹត្តិការណ៍សំខាន់ៗ ?

ដើម្បីងាយចងចាំព្រឹត្តិការណ៍ផ្សេងៗគេត្រូវ
ប្រើបន្ទាត់ពេលវេលាដូចខាងក្រោម



ឆ្នាំ

- ១៨៦៣ អាណានិគមបារាំង
- ១៩៥៣ បានឯករាជ្យ (របបរាជានិយម)
- ១៩៧០ របបសាធារណរដ្ឋ
- ១៩៧៥ របបកម្ពុជាប្រជាធិបតេយ្យ
- ១៩៧៩ ប្រទេសបានរំដោះរួចពីអំពើប្រល័យពូជសាសន៍
- ១៩៩៣ សម្តេចព្រះនរោត្តម សីហនុឡើងគ្រងរាជ្យ
- ២០០៤ សម្តេចព្រះនរោត្តម សីហមុនីឡើងគ្រងរាជ្យ

គេប្រើបន្ទាត់ពេលវេលាឬព្រួញកាលសម្រាប់សម្គាល់ព្រឹត្តិការណ៍សំខាន់ៗ ។



ដើម្បីងាយស្រួលកត់ត្រានិងចងចាំពេលវេលានៃព្រឹត្តិការណ៍ទាំងឡាយដែលកើតឡើងក្នុងជីវភាពរស់នៅ ឬ ក្នុងព្រឹត្តិការណ៍ជាប្រវត្តិសាស្ត្រគេអាចប្រើបន្ទាត់ពេលវេលា ។



**១. ចូរឆ្លើយសំណួរខាងក្រោម ។**

ក. តើបន្ទាត់ពេលវេលាមានដៅបង្ហាញពីអ្វីខ្លះ ?

ខ. តើពេលវេលាដែលដៅនៅលើបន្ទាត់ពេលវេលាអាចជាអ្វីខ្លះ ?

គ. ហេតុអ្វីបានជាគេចូលចិត្តប្រើបន្ទាត់ពេលវេលា ?

**២. ចូរគូសបន្ទាត់ពេលវេលា (គិតជាម៉ោង) ដើម្បីបង្ហាញពីសកម្មភាពសំខាន់ៗរបស់អ្នកកាលពីម្សិលមិញ ។**



មេរៀនទី

# 2 រុក្ខជាតិដែលខ្ញុំដាំ

## ក. ការដុះលូតលាស់របស់រុក្ខជាតិ

- តើរុក្ខជាតិដុះលូតលាស់តាមបែបណាខ្លះ?




១



លូតលាស់ចេញពីគ្រាប់ ។

២



លូតលាស់ចេញពីមើម ។

៣



លូតលាស់ដោយការកាត់បណ្ដុះ (ដើម ឬ មែក) ។

រុក្ខជាតិមានច្រើនប្រភេទណាស់ ។ រុក្ខជាតិខ្លះអាចដុះលូតលាស់ចេញពីគ្រាប់ ខ្លះលូតលាស់ចេញពីមើម និងខ្លះទៀតលូតលាស់ដោយការកាត់បណ្ដុះ (ដើម ឬ មែក) ។

## ខ. សារប្រយោជន៍នៃរុក្ខជាតិ

- តើរុក្ខជាតិមានសារប្រយោជន៍ដូចម្ដេចខ្លះ?



នៅជុំវិញខ្លួនយើងមានរុក្ខជាតិជាច្រើនដែលផ្ដល់ផលប្រយោជន៍ដល់មនុស្សនិងសត្វ ។



រុក្ខជាតិមួយចំនួនជាអាហាររបស់មនុស្ស ។



រុក្ខជាតិជាជម្រករបស់មនុស្សនិងសត្វ ។



រុក្ខជាតិមួយចំនួនផ្ដល់ជាសម្ភារៈសំណង់ផ្សេងៗ ។

## គ. ការថែទាំរុក្ខជាតិ

- រុក្ខជាតិផ្តល់ផលប្រយោជន៍ជាច្រើនដល់មនុស្ស ។ ដូចនេះតើយើងត្រូវថែទាំរុក្ខជាតិដូចម្តេចខ្លះ?



យើងត្រូវថែទាំរុក្ខជាតិដែលមានប្រយោជន៍
ដល់មនុស្សនិងសត្វដោយ

១



ជ្រោយដី បោចស្មៅ ស្រោចទឹក ដាក់ជី ... ។

២



មិនត្រូវកាប់បំផ្លាញ ឬ បេះបោចផ្កាតាមទីសាធារណៈ ។



- រុក្ខជាតិមានការលូតលាស់ខុសៗគ្នា ៖ រុក្ខជាតិខ្លះលូតលាស់ចេញពីគ្រាប់ ខ្លះលូតលាស់ដោយកាត់បណ្ដុះ(ដើម ឬ មែក) ខ្លះទៀតលូតលាស់ដោយសារមើម ។
- រុក្ខជាតិផ្ដល់ផលប្រយោជន៍ជា ៖ អាហារ ឱសថ សម្ភារៈតម្បាញ ជម្រក គ្រឿងសង្ហារិម ... ដល់មនុស្សនិងសត្វ ។ ដូចនេះយើងត្រូវថែរក្សារុក្ខជាតិដោយស្រោចទឹក ជ្រាយដី ដាក់ជីឱ្យបានទៀងទាត់ (ចំពោះដើមឈើដែលយើងដាំ) និងមិនកាប់បំផ្លាញដើមឈើ ។



**ចូរសរសេរឈ្មោះរុក្ខជាតិដាក់ឱ្យត្រូវនឹងអត្ថន័យក្នុងតារាងខាងក្រោម**

| ល.រ | អាហារ | សំណង់ | លម្អ | ឱសថ | តម្បាញ |
|---|---|---|---|---|---|
| ១ | ស្រូវ | ដើមស្រឡៅ | ផ្កាកូលាប | ត្រួយត្របែក | ដើមកប្បាស |
| ២ | | | | | |
| ៣ | | | | | |
| ៤ | | | | | |
| ៥ | | | | | |
| ៦ | | | | | |
| ៧ | | | | | |
| ៨ | | | | | |
| ៩ | | | | | |
| ១០ | | | | | |

មេរៀនទី

# 3 សត្វដែលខ្ញុំចិញ្ចឹម

## ក. ចំណែកថ្នាក់សត្វ

- តើគេអាចធ្វើចំណែកថ្នាក់សត្វដូចម្ដេចខ្លះ ?

សត្វមានច្រើនប្រភេទណាស់ ។ គេអាចធ្វើចំណែកថ្នាក់សត្វទាំងអស់តាមទីកន្លែងរស់នៅរបស់វា ។










សត្វទាំងអស់រស់នៅកន្លែងខុសៗគ្នា ។ សត្វខ្លះរស់នៅលើគោក សត្វខ្លះរស់នៅក្នុងទឹក និងខ្លះទៀតរស់នៅលើគោកផងនិងក្នុងទឹកផង ។

## ខ. សត្វគោកផ្សេងៗ

- តើសត្វគោកអាចចែកជាអ្វីខ្លះ ?



សត្វស្លាប ឬ បក្សី





សត្វល្អិត



សត្វលូន ឬ ល្មូន



សត្វចិញ្ចឹមកូនដោយទឹកដោះ

គេអាចធ្វើចំណែកថ្នាក់សត្វគោកតាមលក្ខណៈរូបរបស់វា :

១. សត្វមានខ្លួនគ្របដណ្ដប់ដោយរោម ។ វាចិញ្ចឹមកូនដោយទឹកដោះ ។

២. សត្វមានផ្កាំងស្លាបពីរគ្របលើដងខ្លួន ហៅថាបក្សី ឬ សត្វស្លាប ។

៣. សត្វមានខ្លួនគ្របដណ្ដប់ដោយស្រកា ហើយភាគច្រើនមានជើងបួនខ្លីខ្លះគ្មានជើងទេ ហៅថាល្មូន ។

៤. សត្វមានខ្លួនចែកជាក្បាល ទ្រូង ពោះ និងជើងពីរគូ ។ សត្វខ្លះនៅលើក្បាលមានប្រមោយឬស្នែង ។

## គ. ផលប្រយោជន៍របស់សត្វ

- តើសត្វផ្តល់ផលប្រយោជន៍អ្វីខ្លះដល់មនុស្ស ?

សត្វបានផ្តល់ប្រយោជន៍ច្រើនណាស់ដល់មនុស្ស





## ឃ. របៀបចិញ្ចឹមនិងថែរក្សាសត្វ

ដើម្បីចូលរួមក្នុងការផលិតស្បៀង ប្រជាជនយើង
ចូលចិត្តចិញ្ចឹមសត្វមួយចំនួនដូចជា ជ្រូក មាន់ ទា... ។





ដើម្បីចិញ្ចឹមនិងថែរក្សាសត្វទាំងនោះតើគេត្រូវធ្វើដូចម្ដេចខ្លះ ?





ឧទាហរណ៍ ប្រសិនបើគេចង់ចិញ្ចឹមមាន់ឱ្យបានផល
ច្រើនគេត្រូវ ៖

- ជ្រើសរើសពូជណាដែលល្អ
- ចិញ្ចឹមដោយដាក់ក្នុងរោងនិងទ្រុង
- ផ្ដល់ចំណីឱ្យបានគ្រប់គ្រាន់
- ធ្វើអនាម័យរោងនិងទ្រុងជាប្រចាំ
- ត្រូវចាក់ថ្នាំបង្ការជំងឺ ។



គេអាចធ្វើចំណែកថ្នាក់សត្វទៅតាមកន្លែងរស់នៅរបស់វា ៖ សត្វរស់នៅក្នុងទឹក សត្វរស់នៅលើគោក និងសត្វរស់នៅលើគោកផងនិងរស់នៅក្នុងទឹកផង ។

សត្វរស់នៅលើគោកមាន សត្វចិញ្ចឹមកូនដោយទឹកដោះ សត្វស្លាប សត្វលូន ឬ ល្មូន និងសត្វល្អិត ។ សត្វជាច្រើនបានផ្តល់ផលប្រយោជន៍ដល់មនុស្ស ។ យើងត្រូវចិញ្ចឹមនិងថែរក្សាសត្វឱ្យបានល្អ ។



**ចូរបំពេញល្បះខាងក្រោមឱ្យមានន័យត្រឹមត្រូវ ។**

ក្នុងការធ្វើស្រែចំការ គេយក...គ... ឬ ....ក...ី ធ្វើជាកម្លាំងអូសទាញ ។ រីឯ ....ំ...ី វិញ គេប្រើជាជំនិះកាត់ព្រៃនិងអូ...ឈើហុប ។ ចំណែកសត្វមា...និងទ... គេចិញ្ចឹមសម្រាប់ធ្វើជាអ...ហ...រ ។ ដើម្បីចូលរួមក្នុងការផលិតេ...ៀ...យើងត្រូវចិ...្ចឹម និងែ...រ...្សាសត្វឱ្យបានល្អដោយផ្តល់...ណី ទឹកនិងសំអ...កន្លែងវាជា...បច... ។

ជំពូកទី

# ៤ ជីវភាពប្រជាជននៅសហគមន៍ខ្ញុំ

យើងទាំងអស់គ្នាមានទីកន្លែងរស់នៅនិងមានជីវភាពខុសៗគ្នា ។ ដូចនេះក្នុងជំពូកនេះ យើងត្រូវសិក្សាអំពី



មេរៀនទី

# 1 ទីកន្លែងដែលខ្ញុំរស់នៅ

## ក. ទីតាំងរាជធានី ឬ ខណ្ឌដែលខ្ញុំរស់នៅ










ខណ្ឌព្រែកព្នៅមានព្រំប្រទល់ខាងកើតជាប់នឹងស្រុកមុខកំពូល ខាងលិចជាប់នឹងស្រុកឧត្ដុង្គ ខាងជើងជាប់នឹងស្រុកពញាឮ និងខាងត្បូងជាប់នឹងខណ្ឌឫស្សីកែវ និងសែនសុខ ។ ខណ្ឌនេះមានចម្ងាយប្រហែល ១៥គីឡូម៉ែត្រពីវត្តភ្នំ ។

យើងទាំងអស់គ្នាគប្បីស្គាល់ឈ្មោះរាជធានី-ខេត្ត ខណ្ឌ-ស្រុក សង្កាត់-ឃុំ និងភូមិដែលយើងរស់នៅឱ្យបានច្បាស់ ។

## ២. សង្កាត់ព្រែកព្នៅ

- តើសង្កាត់ព្រែកព្នៅមានការប្រែប្រួលដូចម្តេចខ្លះ ?

សង្កាត់ព្រែកព្នៅមានសាលារៀនពីមត្តេយ្យរហូតដល់វិទ្យាល័យជាច្រើន ។





មានផ្ទះប្រជាជនច្រើន ហើយប្រជាជនភាគច្រើនមានជីវភាពធូរធារ ។



បច្ចុប្បន្នសង្កាត់ព្រែកព្នៅមានស្ពានមួយឆ្លងកាត់ទន្លេសាប ។



## គ. ទេសភាពស្រុកខ្ញុំ



តើស្រុកនេះមានទេសភាពដូចម្ដេចខ្លះ ដែលធ្វើឱ្យភ្ញៀវទេសចរណ៍ចាប់អារម្មណ៍?











ស្រុកយើងមានទេសភាពល្អណាស់ ពេលខ្លះមានពណ៌លឿងទុំ ពេលខ្លះមានពណ៌បៃតង ពេលខ្លះមានទឹកល្ហល្ហាច ។



យើងត្រូវស្គាល់ឱ្យបានច្បាស់ពីទីកន្លែងដែលយើងរស់នៅដូចជា ឈ្មោះភូមិ ឃុំ-សង្កាត់ ស្រុក-ខណ្ឌ ឈ្មោះខេត្ត-រាជធានី និងលក្ខណៈពិសេសរបស់ទីតាំងនោះដូចជាឈ្មោះភ្នំ ឬ កន្លែង ឬ វត្ថុអ្វីដែលធ្វើឱ្យគេចាប់អារម្មណ៍ ។



**ចូរបំពេញល្បះខាងក្រោមឱ្យមានន័យត្រឹមត្រូវទៅតាមទីតាំងដែលអ្នកកំពុងរស់នៅ ។**

ខ្ញុំរស់នៅភូមិ ............ ឃុំ / សង្កាត់ ............. ស្រុក / ខណ្ឌ ............ ខេត្ត / ក្រុង ............. ។ ឃុំ / សង្កាត់ ខ្ញុំមានភូមិចំនួន .............. ។ ចំណែកស្រុក / ខណ្ឌ ខ្ញុំមានឃុំ / សង្កាត់ចំនួន ............. ។ ស្រុក/ខណ្ឌខ្ញុំមានព្រំប្រទល់ខាងកើតជាប់ជាមួយស្រុក / ខណ្ឌ ......................... ខាងលិចជាប់ជាមួយស្រុក / ខណ្ឌ ................. ខាងជើងជាប់ជាមួយស្រុក / ខណ្ឌ ............. និងខាងត្បូងជាប់ជាមួយស្រុក / ខណ្ឌ ................ ។

ប្រជាជននៅភូមិខ្ញុំភាគច្រើនប្រកបមុខរបរធ្វើ ................ ។ នៅឃុំ / សង្កាត់ ខ្ញុំមានសាលារៀនចំនួន ...................... កន្លែង ។

មេរៀនទី

# 2 កន្លែងផ្សេងៗនៅភូមិខ្ញុំ

## ក. ភូមិខ្ញុំ



តើភូមិអ្នកមានកន្លែងសំខាន់ៗអ្វីខ្លះ ?




ភូមិនីមួយៗតែងមានកន្លែងពិសេសសម្រាប់សម្គាល់ ។ ឧទាហរណ៍ : ភូមិខ្ញុំមានមណ្ឌលសុខភាព ផ្សារ វត្ត សាលារៀន និងកន្លែងលំហែកាយ ... ។

## ខ. គូរទីតាំងនៃកន្លែងសំខាន់ៗក្នុងភូមិខ្ញុំ



តើឯងអាចគូសទីតាំងនៃកន្លែងសំខាន់ៗក្នុងភូមិរបស់ឯងបង្ហាញខ្ញុំបានឬទេ ?

ភូមិខ្ញុំមានកន្លែងសំខាន់ៗជាច្រើនដូចជា សាលារៀន វត្ត កន្លែងកម្សាន្ត ...



ខាងក្រោមនេះជាផែនទីបង្ហាញទីតាំងសំខាន់ៗដែលមាននៅភូមិខ្ញុំ




គេអាចស្គាល់ទីតាំងភូមិ ឬ ឃុំ ឬ ស្រុក ឬ ខេត្តដែលគេរស់នៅបានយ៉ាងស្រួលតាមរយៈការគូរផែនទី ដោយដៅទីតាំងកន្លែងសំខាន់ៗឱ្យបានច្បាស់លាស់ ។

## គ. ផ្លូវពីផ្ទះទៅសាលារៀន



តាមរយៈគំនូរផែនទីរបស់ឯងនេះ សូមឯងនិយាយនិង បង្ហាញទីតាំងផ្ទះរបស់ឯងធៀបនឹងសាលារៀនឱ្យខ្ញុំ បានស្គាល់ផង ។



ផ្ទះខ្ញុំស្រួលចំណាំណាស់ ហើយងាយស្រួលរកទៀតផង ព្រោះផ្ទះខ្ញុំស្ថិតនៅខាងជើងថ្នល់ជាតិនិងនៅខាងលិច សាលាបឋមសិក្សា ... ដែលខ្ញុំរៀន ។








ក្នុងការបង្ហាញទីតាំងណាមួយ នៅពេលយើងគូរផែនទីហើយយើងត្រូវដៅទិសបញ្ជាក់ដើម្បីឱ្យអ្នកមើលងាយយល់ ។



នៅក្នុងភូមិដែលយើងរស់នៅ តែងមានកន្លែងសំខាន់ៗសម្រាប់សម្គាល់ ។ គេអាចស្គាល់ទីកន្លែងយើងរស់នៅបានតាមរយៈការគូរផែនទីដោយដៅចំណុចសំខាន់ៗដែលមានក្នុងទីកន្លែងនោះ ។



**១. ចូរគូសសញ្ញា ✓ ក្នុងប្រអប់នៅមុខឈ្មោះទីតាំងណាដែលមានក្នុងភូមិរបស់អ្នក ។**

| | | |
|---|---|---|
| ☐ វត្ត | ☐ មណ្ឌលសុខភាព | ☐ សាលារៀន |
| ☐ សាលាឃុំ/សង្កាត់ | ☐ សាលាខេត្ត/ក្រុង | ☐ ភ្នំ |
| ☐ ផ្សារ | ☐ កន្លែងកម្សាន្ត | ☐ ទន្លេ ។ |

**២. ចូរគូរនិងផាត់ពណ៌ផែនទីភូមិរបស់អ្នក (ពីផ្ទះទៅកាន់កន្លែងផ្សេងៗដែលអ្នកបានឆ្លើយក្នុងសំណួរទី១ ដោយមានដាក់សញ្ញាសម្គាល់ ។**

មេរៀនទី

3

# រុក្ខជាតិនានានៅភូមិខ្ញុំ

## ក. រុក្ខជាតិនានា





នៅជុំវិញកន្លែងដែលយើងរស់នៅមានរុក្ខជាតិច្រើនណាស់ ហើយភាគច្រើនមានពណ៌បៃតង ។ រុក្ខជាតិទាំងអស់មានឈ្មោះ រូបរាង និងទីកន្លែងដុះខុសៗគ្នា ។

## ខ. ចំណែកថ្នាក់រុក្ខជាតិ

- តើរុក្ខជាតិអាចដុះនៅកន្លែងណាខ្លះ ?





គេអាចចែករុក្ខជាតិទៅតាមកន្លែងដែលវាដុះលូតលាស់





រុក្ខជាតិដុះលើគោក



រុក្ខជាតិដុះក្នុងអាកាស





រុក្ខជាតិដុះក្នុងទឹក

រុក្ខជាតិទាំងអស់ដុះលូតលាស់នៅកន្លែងខុសៗគ្នា ។ ខ្លះដុះលើគោក ខ្លះដុះក្នុងទឹក និងខ្លះទៀតដុះក្នុងអាកាស ។

• តើរុក្ខជាតិទាំងអស់មានរូបរាងខុសគ្នាដូចម្ដេចខ្លះ ?



រុក្ខជាតិទាំងអស់មានរូបរាងមិនដូចគ្នាទេ ។ រុក្ខជាតិខ្លះមានដើមធំ ខ្លះមានដើមតូច ខ្លះមានដើមទន់ ... ។ គេអាចបែងចែករុក្ខជាតិជា


រុក្ខជាតិធំ


រុក្ខជាតិទាប


រុក្ខជាតិវល្លិ


រុក្ខជាតិស្មៅ

រុក្ខជាតិទាំងអស់តែងតែមានដើមនិងស្លឹក ប៉ុន្តែដើមនិងស្លឹកទាំងនេះមានរូបរាងមិនដូចគ្នាទេ ព្រោះរុក្ខជាតិខ្លះជា :

- រុក្ខជាតិធំមានដើមខ្ពស់ បែកមែកសាខាធំៗហើយរឹងមាំ ។
- រុក្ខជាតិទាបភាគច្រើនជារុក្ខជាតិលម្អ មានកម្ពស់ទាបជាងពីរម៉ែត្រ ។
- រុក្ខជាតិវល្លិមានដើមទន់ លូតលាស់ដោយវារ ។
- រុក្ខជាតិស្មៅមានដើមទន់ ស្លឹកតូចវែង មានកម្ពស់ទាប ។



រុក្ខជាតិទាំងអស់អាចបែងចែកទៅតាម ៖

- ទីកន្លែងដែលរុក្ខជាតិដុះ ៖ រុក្ខជាតិគោក រុក្ខជាតិទឹក និង រុក្ខជាតិអាកាស ។
- រូបរាងរបស់រុក្ខជាតិ ៖ រុក្ខជាតិធំ រុក្ខជាតិទាប រុក្ខជាតិវល្លិ និងរុក្ខជាតិស្មៅ ។





១. ចូររាប់ឈ្មោះរុក្ខជាតិទឹកដែលអ្នកស្គាល់ ។

២. ចូរសរសេរឈ្មោះរុក្ខជាតិដែលអ្នកស្គាល់ក្នុងតារាងខាងក្រោម ។

| រុក្ខជាតិលើគោក | រុក្ខជាតិក្នុងទឹក |
|---|---|
| ១. ........................ | ១. ........................ |
| ២. ........................ | ២. ........................ |
| ៣. ........................ | ៣. ........................ |
| ៤. ........................ | ៤. ........................ |
| **រុក្ខជាតិធំ** | **រុក្ខជាតិវល្លិ** |
| ១. ........................ | ១. ........................ |
| ២. ........................ | ២. ........................ |
| ៣. ........................ | ៣. ........................ |
| ៤. ........................ | ៤. ........................ |

មេរៀនទី

# 4 ខ្ញុំរៀនច្រៀងចម្រៀង

## ក. បទនគររាជ ( ចម្រៀងជាតិ )



១. សូមពួកទេព្តា រក្សាមហាក្សត្រយើង
ឱ្យបានរុងរឿង ដោយជ័យមង្គល
សិរីសួស្តី យើងខ្ញុំព្រះអង្គសូមជ្រកក្រោមម្លប់ព្រះបារមី
នៃព្រះនរបតី វង្សក្សត្រាដែលសាងប្រាសាទថ្ម
គ្រប់គ្រងដែនខ្មែរ បុរាណថ្កើងថ្កាន ។

២. ប្រាសាទសិលា កំបាំងកណ្តាលព្រៃ
គួរឱ្យស្រមៃ នឹកដល់យសសក្តិ
មហានគរ ជាតិខ្មែរដូចថ្មគង់វង្សនៅល្អរឹងប៉ឹងជំហរ
យើងសង្ឃឹមពរ ភ័ព្វព្រេងសំណាងរបស់កម្ពុជា
មហារដ្ឋកើតមាន យូរអង្វែងហើយ ។

៣. គ្រប់វត្តអារាម ឮតែសូរសព្ទធម៌
សូត្រដោយអំណរ រំលឹកគុណ
ពុទ្ធសាសនា ចូរយើងជាអ្នកជឿជាក់ស្មោះស្ម័គ្រតាមបែបដូនតា
គង់តែទេព្តា ជួយជ្រោមជ្រែងផ្គត់ផ្គង់ប្រយោជន៍ឱ្យ
ដល់ប្រទេសខ្មែរ ជាមហានគរ ។

## ២. ចម្រៀងប្រជាប្រិយ “ បទអបអរសាទរ ”

ការទទួលភ្ញៀវមានច្រើន
បែបណាស់ ។ ប៉ុន្តែពេលខ្លះ
យើងទទួលភ្ញៀវដោយច្រៀង
ចម្រៀងដូចខាងក្រោម ។









១. អបអរសាទរ ទទួលអំណរបវរសួស្តី
អបអរសាទរ ស្មារតីគាំទ្រអន្តរជាតិថ្លាថ្លៃ
សូមឱ្យបានជោគជ័យ សិរីសួស្តីសុភមង្គល ។

២. ជយោប្រិយមិត្ត ឆ្ងាយជិតដែលអញ្ជើញមក
ទស្សនាប្រទេសខ្ញុំ សូមទទួលស្វាគមន៍ដោយចិត្តស្មោះសរ
សូមលើកដៃជូនពរ សិរីបវរនិងជ័យជម្នះ ។

## គ. បទ “ ពេលព្រឹកព្រលឹម ”



ដើម្បីក្លាយខ្លួនជាកូនល្អ សិស្សល្អ
យើងត្រូវធ្វើតាមដំបូន្មានម៉ែ ឪ





១. មាន់រងាវហើយកូនអើយក្រោកឡើង
ម៉ែបានអុជភ្លើងបំភ្លឺហើយណា
ក្រោកភ្លាមៗ ឱណាកូនណា ( ស្ទួន )

២. សៀវភៅខ្មៅដៃកូនកុំភ្លេចណា
ប្រសើរអស្ចារ្យជាងការរត់លេង
យើងត្រូវរៀនសូត្រទាន់ខ្លួននៅក្មេង ( ស្ទួន )
កូនកុំនៅគេងក្រោកឡើងធ្វើការ ។



## ឃ. បទប្រពៃណី “ បទស្រីបុកស្រូវ ” ( បទភ្លេងមហោរី )



១. បើនាងបុកស្រូវ　កុំចោលអង្កាម　(២ដង)
ចាស់ទុំៗលោកហាម　អង្កាមជាន់ឥដ្ឋ　(២ដង)។

២. អង្ករសម្រូប　ទៅជាសម្រិត　(២ដង)
សម្រាំងៗពិចិត្រ　ដោយសារដៃនាង(២ដង)។

៣. បើនាងបុកស្រូវ　កុំចោលកន្ទក់　(២ដង)
ចិញ្ចឹមៗជ្រូកលក់　បានប្រាក់រាល់ថ្ងៃ　(២ដង)។

## ង. បទប្រពៃណី “ បទម្លប់ដូង ” ( បទភ្លេងការ )



១. ឱម្លប់ដូងអើយៗ　ដែលខ្ញុំធ្លាប់ជ្រក (២ដង)
លោកមេបាៗហៅមក　ឱ្យអង្គុយលើព្រំៗ(២ដង)។

២. បាំងឆត្រជូនម្ដាយៗ　លោកឪពុកជាធំៗ(២ដង)
អ្នកមានៗគុណខ្ញុំ　ដូចភ្នំព្រះសុមេរុៗ(២ដង)។

៣. ដែលលោកថ្នាក់ថ្នមៗ　បីបមខំថែៗ　(២ដង)
ស្មើភ្នំៗព្រះសុមេរុ　រកអ្វីផ្ទឹមគ្មានៗ　(២ដង)។

មេរៀនទី

# 5 ខ្ញុំហាត់រាំ



## ក. ចង្វាក់រាំវង់បែបទី២

- តើចង្វាក់រាំវង់បែបទី២ គេរាំដូចម្តេច ?




រាំវង់បែបទី២ មានបួនដំណាក់ ។ គេរាំបីជំហានទៅមុខ មួយជំហានថយក្រោយ ។

## ខ. ចង្វាក់រាំវង់បែបទី៣

- តើចង្វាក់រាំវង់បែបទី៣ គេរាំដូចម្ដេច ?




ចង្វាក់រាំវង់បែបទី៣មានលក្ខណៈខុសប្លែកពីចង្វាក់រាំវង់បែបទី១ និងទី២ ។ ចង្វាក់រាំវង់បែបទី៣គេរាំឈានបីជំហានទៅមុខ មួយជំហានឈូសលើកបន្តិច ។

## គ. ចង្វាក់រាំវង់បែបទី៤

- តើចង្វាក់រាំវង់បែបទី៤ គេរាំដូចម្ដេច ?




ចង្វាក់រាំវង់បែបទី៤ គេរាំ៤ជំហានទៅមុខ មួយជំហានថយក្រោយ ។ ដំណាក់ទី១ដូចដំណាក់ទី៣ ឯដំណាក់ទី២ដូចដំណាក់ទី៤ ។



➢ ចង្វាក់រាំវង់បែបទី២ គេរាំបីជំហានទៅមុខ មួយជំហានថយក្រោយ ។
➢ ចង្វាក់រាំវង់បែបទី៣ គេរាំបីជំហានទៅមុខ មួយជំហានឈូសលើកបន្តិច ។
➢ ចង្វាក់រាំវង់បែបទី៤ គេរាំបួនជំហានទៅមុខ មួយជំហានថយក្រោយ ។



**ចូរឆ្លើយសំណួរខាងក្រោម**

១. តើនៅដំណាក់ទី៤នៃចង្វាក់រាំវង់បែបទី៣ គេត្រូវធ្វើចង្វាក់ជើងដូចម្តេច ?
២. តើចង្វាក់រាំវង់បែបទី៤ គេរាំដូចម្តេច ?
៣. តើចង្វាក់រាំវង់បែបទី៣ និងទី៤ ខុសគ្នាដូចម្តេចខ្លះ ?
៤. ចង្វាក់រាំវង់បែបទី៤ តើនៅដំណាក់ទីប៉ុន្មានដែលអ្នករាំត្រូវថយក្រោយមួយជំហាន ?
៥. តើនៅដំណាក់មួយណាដែលចង្វាក់រាំវង់ទាំង៤បែបមានលក្ខណៈដូចគ្នា ?

មេរៀនទី

# 6 ខ្ញុំរៀនត្បាញនិងបិទរូប

## ក. តម្បាញ " លើកមួយសង្កត់មួយ "



ដើម្បីត្បាញតាមរូបនេះខ្ញុំត្រូវ



### ១. មានសម្ភារៈ

- ក្រដាសពណ៌ (ពីរពណ៌) ឬ ស្លឹកចេក ស្លឹកដូង ស្លឹកត្នោត ...
- កាវ
- ខ្មៅដៃ
- បន្ទាត់
- ជ័រលុប
- កន្ត្រៃ ឬ កាំបិត ។

### ២. កាត់ក្រដាស

- យកក្រដាសពណ៌មួយផ្ទាំងដែលមានរាងការេ មកបត់ជាពីរឱ្យត្រួតស៊ីគ្នា
- គូសបន្ទាត់ឈរដែលមានចន្លោះស្មើៗគ្នា រួចកាត់តាមស្នាមគំនូស (កាត់ទុកគែមកុំឱ្យដាច់)
- យកក្រដាសមួយផ្ទាំងទៀតមកធ្វើដូចផ្ទាំងទីមួយដែរ តែត្រូវកាត់ដាច់ពីគ្នាជាចម្រៀកៗ ។

### ៣. ត្បាញ

យកក្រដាសតូចៗ (ចម្រៀក) ដែលកាត់នោះទៅស៊កត្បាញដោយលើកមួយសង្កត់មួយ ហើយឆ្លាស់ក្រឡាគ្នារហូតដល់ពេញ ។

## ២. តម្បាញ “ លើកពីរសង្កត់ពីរ ”

តើការត្បាញលើកពីរសង្កត់ពីរ
គេត្រូវមានសម្ភារៈអ្វីខ្លះ?
ធ្វើដូចម្តេច?

ដើម្បីត្បាញលើកពីរសង្កត់ពីរយើង
ត្រូវមានសម្ភារៈនិងកាត់ក្រដាសដូច
ការត្បាញលើកមួយសង្កត់មួយដែរ ។



ការត្បាញនេះមានលក្ខណៈប្រហាក់ប្រហែលគ្នានឹងការត្បាញលើក
មួយសង្កត់មួយដែរគឺគ្រាន់តែស៊កពីរលើនិងពីរក្រោមប៉ុណ្ណោះ ។



យើងខិតខំរៀនត្បាញតាមរបៀប
- លើកមួយសង្កត់មួយ
- លើកពីរសង្កត់ពីរ

ឱ្យបានចេះស្ទាត់ ។



## គ. ការគូរនិងផាត់ពណ៌ " ទង់ជាតិប្រទេសកម្ពុជា "

• ដើម្បីគូរនិងផាត់ពណ៌ "ទង់ជាតិប្រទេសកម្ពុជា" តើគេត្រូវមានអ្វីខ្លះ? ហើយធ្វើដូចម្តេច?



ដើម្បីគូរនិងផាត់ពណ៌ "ទង់ជាតិប្រទេសកម្ពុជា" យើងត្រូវមានសម្ភារៈមួយចំនួន គិតពីរបៀបគូរ និងគិតពីរបៀបផាត់ពណ៌ ។

### ១. សម្ភារៈ

ក្រដាសស១ផ្ទាំង ខ្មៅដៃ បន្ទាត់ ជ័រលុប ខ្មៅដៃពណ៌ (ខៀវ ក្រហម) ។

### ២. របៀបគូរ




### ៣. របៀបផាត់ពណ៌



## ឃ. ការកាត់បិទធ្វើ " ទង់ជាតិប្រទេសកម្ពុជា "

• ដើម្បីកាត់បិទធ្វើ "ទង់ជាតិប្រទេសកម្ពុជា" តើគេត្រូវមានអ្វីខ្លះ? ហើយធ្វើដូចម្ដេច?



ដើម្បីកាត់បិទធ្វើ "ទង់ជាតិប្រទេសកម្ពុជា" យើងត្រូវមានសម្ភារៈមួយចំនួន គិតពីរបៀបគូរ របៀបកាត់ និងរបៀបបិទផ្គុំ ។

### ១. សម្ភារៈ

ក្រដាសពណ៌ខៀវ ក្រដាសពណ៌ក្រហម ក្រដាសពណ៌ស ខ្មៅដៃ បន្ទាត់ ជ័រលុប កាវ កន្ត្រៃ។

### ២. របៀបគូរនិងកាត់




ក្រដាសពណ៌ខៀវ




ក្រដាសពណ៌ក្រហម




ក្រដាសពណ៌ស (គូររូបប្រាសាទរួចកាត់យករូបប្រាសាទ)

### ៣. របៀបបិទ




បិទ (ក) ភ្ជាប់ជាមួយ(គ)
បិទ (ខ) ភ្ជាប់ជាមួយ(គ)




បិទ (ឃ) ចំកណ្ដាល(គ)

មេរៀនទី

7

# អ្នកដឹកនាំភូមិខ្ញុំ

ក. ភូមិ




ផ្ទះច្រើនខ្នងនៅផ្តុំរួមគ្នាបង្កើតបានជាភូមិមួយ ។ ភូមិនីមួយៗមានឈ្មោះនិងប្រវត្តិមិនដូចគ្នាទេ ។ ភូមិខ្លះតូច ភូមិខ្លះធំអាស្រ័យនឹងចំនួនផ្ទះតិច ឬ ច្រើន ។

## ខ. មេភូមិ



តើក្នុងភូមិនីមួយៗមានអ្នកណាជាអ្នកដឹកនាំ ? តើគាត់មានភារកិច្ចអ្វីខ្លះ ?






ភូមិមួយត្រូវមានមេភូមិម្នាក់ជាអ្នកដឹកនាំនិងទទួលខុសត្រូវ ។ មេភូមិជាតំណាងប្រជារាស្ត្រក្នុងភូមិខ្លួន ហើយទទួលខុសត្រូវចំពោះរាជការឃុំ ។ មេភូមិមានភារកិច្ចរក្សារបៀបរៀបរយក្នុងភូមិ បញ្ជូនព័ត៌មានសំខាន់ៗទៅមេឃុំ និងនាំព័ត៌មានពីឃុំទៅឱ្យប្រជាជន ។



ផ្ទះច្រើនខ្នងផ្តុំគ្នាបានជាភូមិ ។ ភូមិនីមួយៗមានឈ្មោះនិងប្រវត្តិខុសគ្នា ។ ភូមិមួយត្រូវមានមេភូមិម្នាក់ជាអ្នកទទួលខុសត្រូវ ។ មេភូមិជាតំណាងប្រជារាស្ត្រក្នុងភូមិ ដោយទទួលខុសត្រូវចំពោះរាជការឃុំ ។



**ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោមឱ្យមានន័យត្រឹមត្រូវ ។**

| | | | | |
|---|---|---|---|---|
| មេភូមិ | រានដី | តូច | ទទួលខុសត្រូវ | ឈ្មោះ |
| ចំនួន | រួមគ្នា | ប្រជារាស្ត្រ | ផ្លូវ | |

ផ្ទះច្រើនខ្នង .......................បង្កើតបានជាភូមិមួយ ។ ភូមិនីមួយៗមាន ............និងប្រវត្តិខុសៗគ្នា ។ ភូមិខ្លះ ..................ភូមិខ្លះធំអាស្រ័យនឹង...........ផ្ទះតិច ឬ ច្រើន ។ ដើម្បីពង្រីកភូមិគេត្រូវ ............សម្រាប់សង់ផ្ទះធ្វើ ..................និងធ្វើស្រែចម្ការ ។ ភូមិមួយត្រូវមាន ...............ម្នាក់ជាអ្នកដឹកនាំនិងទទួលខុសត្រូវ ។ មេភូមិជាតំណាង ...................ក្នុងភូមិខ្លួនហើយ .............ចំពោះរាជការឃុំ ។

ជំពូកទី

# ៥ ពិភពនៅជុំវិញខ្ញុំ

យើងទាំងអស់គ្នាកំពុងរស់នៅក្នុងប្រទេសកម្ពុជា ។ យើងចាំបាច់ត្រូវស្គាល់ឱ្យបានច្បាស់ពីទង់សញ្ញានិងភារៈមួយចំនួនដែលនៅជុំវិញយើង ។ ក្នុងជំពូកនេះ យើងត្រូវសិក្សាអំពី



មេរៀនទី

1

# ទង់ជាតិ

## ក. ប្រទេសកម្ពុជា

- តើប្រទេសកម្ពុជាមានព្រំប្រទល់ជាប់នឹងប្រទេសណាខ្លះ?




ប្រទេសកម្ពុជាមានរាជធានី១ និងខេត្តចំនួន ២៤ ហើយមានព្រំប្រទល់ខាងកើតជាប់នឹងប្រទេសវៀតណាម ខាងជើងជាប់នឹងប្រទេសឡាវ ខាងលិចជាប់នឹងប្រទេសថៃ និងខាងត្បូងជាប់នឹងឈូងសមុទ្រថៃ ។

## ២. ទង់ជាតិ

- តើគេអាចស្គាល់ប្រទេសនីមួយៗដោយសារអ្វី ?



គេអាចស្គាល់ប្រទេសនីមួយៗដោយសារទង់ជាតិ ។
ទង់ជាតិជាសញ្ញាសម្គាល់របស់ប្រទេសនីមួយៗ ។

### ១. ទង់ជាតិប្រទេសកម្ពុជា

ទង់ជាតិប្រទេសកម្ពុជាមាន ៣ ពណ៌ : ពណ៌ខៀវ
នៅជាយសងខាង និងពណ៌ក្រហមនៅកណ្ដាល ។
នៅចំកណ្ដាលផ្ទៃក្រហមមានរូបអង្គរវត្តពណ៌ស ។





ពណ៌ខៀវនៃទង់ជាតិប្រទេសកម្ពុជា តំណាងសេរីភាព សាមគ្គីភាព ភាតរភាព ។ ពណ៌ក្រហមតំណាងភាពក្លាហានតស៊ូ ។ ពណ៌សតំណាងភាពសច្ចៈ ស្មោះត្រង់ យុត្តិធម៌ និងមានអរិយធម៌រុងរឿង ។

## ២. ទង់ជាតិប្រទេសជិតខាងនៃប្រទេសកម្ពុជា



តើទង់ជាតិប្រទេសជិតខាងយើងមានលក្ខណៈសម្គាល់ដូចម្តេចខ្លះ ?

ទង់ជាតិប្រទេសជិតខាងយើងមានសញ្ញាសម្គាល់ :



ទង់ជាតិប្រទេសវៀតណាម




ទង់ជាតិប្រទេសឡាវ




ទង់ជាតិប្រទេសថៃ





ប្រទេសកម្ពុជាមានព្រំប្រទល់ជាប់នឹងប្រទេស ៣គឺ ប្រទេសថៃ ប្រទេសវៀតណាម និងប្រទេសឡាវ ។ ប្រទេសទាំងអស់សុទ្ធតែមានទង់ជាតិដែលជាសញ្ញាសម្គាល់របស់ខ្លួន ។

ពណ៌នៃទង់ជាតិប្រទេសកម្ពុជាបង្ហាញឱ្យឃើញពីសេរីភាព សាមគ្គីភាព ភាតរភាព ភាពក្លាហានតស៊ូ សច្ចៈ ស្មោះត្រង់ យុត្តិធម៌ និងមានអរិយធម៌រុងរឿង ។



១. ចូរគូរនិងផាត់ពណ៌ទង់ជាតិប្រទេសកម្ពុជា ។

២. ចូរបំពេញឈ្មោះប្រទេសនៅក្រោមទង់ជាតិខាងក្រោមនេះ ។



ប្រទេស ..............



ប្រទេស ..............



ប្រទេស ..............



ប្រទេស ..............

មេរៀនទី

# 2 យើងត្រូវការកម្តៅនិងពន្លឺ

## ក. ថាមពល



តើថាមពលជាអ្វី ?

យើងឃើញថាភាវៈទាំងអស់អាចមានចលនា ។ ភាវៈដែលធ្វើចលនាបានសុទ្ធតែប្រើប្រាស់ថាមពល ។



ដូចនេះថាមពល គឺជាអ្វីដែលអាចធ្វើឱ្យវត្ថុមានចលនា ។

## ២. ថាមពលកម្តៅនិងថាមពលពន្លឺ

ហេតុអ្វីបានជាគេថាកម្តៅនិងពន្លឺក៏ជាប្រភេទថាមពលដែរ?

តើថាមពលកម្តៅនិងថាមពលពន្លឺបានមកពីណា ?



កម្តៅក៏ជាប្រភេទមួយនៃថាមពលព្រោះកម្តៅអាចធ្វើឱ្យវត្ថុខ្លះមានចលនា ។

ថាមពលកម្តៅបានមកពីកម្តៅ ឯថាមពលពន្លឺបានមកពីពន្លឺ ។

- ថាមពលកម្តៅខុសពីថាមពលពន្លឺព្រោះ
  - ថាមពលបានមកពីកម្តៅ ហៅថាថាមពលកម្តៅ
  - ថាមពលបានមកពីពន្លឺ ហៅថាថាមពលពន្លឺ ។

## គ. ឥទ្ធិពលនៃកម្ដៅ








កម្ដៅអាចធ្វើឱ្យទឹករាវក្លាយជាឧស្ម័ន



កម្ដៅអាចធ្វើឱ្យទឹករាវក្លាយជាទឹកកក (វត្ថុរឹង)



កម្ដៅអាចធ្វើឱ្យទឹកកករលាយក្លាយជាទឹក(វត្ថុរាវ)

កម្ដៅអាចធ្វើឱ្យវត្ថុរឹងខ្លះរលាយ ។ កម្ដៅអាចធ្វើឱ្យវត្ថុរាវខ្លះក្លាយជាឧស្ម័ន ។ កម្ដៅក៏អាចធ្វើឱ្យវត្ថុរាវខ្លះក្លាយជាវត្ថុរឹង ។



ថាមពលគឺជាអ្វីដែលអាចធ្វើឱ្យវត្ថុមានចលនា ។ ថាមពលកម្ដៅខុសពីថាមពលពន្លឺ ។ ថាមពលកម្ដៅបានមកពីកម្ដៅ រីឯថាមពលពន្លឺបានមកពីពន្លឺ ។ កម្ដៅអាចធ្វើឱ្យទឹក (រាវ) ក្លាយជាឧស្ម័ន ឬ ក្លាយជាដុំទឹកកក (វត្ថុរឹង) ។



**១. ចូរគូសរង្វង់ជុំវិញអក្សរណាដែលជាចម្លើយត្រឹមត្រូវ ។**

- នៅពេលគេដុតកម្ដៅទឹក តើទឹកមានដំណើរប្រែប្រួលដូចម្ដេច ?

  **ក.** ពីរាវទៅរឹង **ខ.** ពីរឹងទៅរាវ

  **គ.** ពីរឹងទៅឧស្ម័ន **ឃ.** ពីរាវទៅឧស្ម័ន ។

- នៅពេលគេយកដុំខ្លាញ់ទៅទុកនៅកន្លែងក្ដៅ តើវាប្រែប្រួលដូចម្ដេច ?

  **ក.** ក្លាយជារឹង **ខ.** ក្លាយជារាវ **គ.** ក្លាយជាឧស្ម័ន ។

**២. ចូររាប់ឈ្មោះវត្ថុដែលអាចផ្ដល់ថាមពលពន្លឺឱ្យបាន ៣ ។**

**៣. តើព្រះអាទិត្យអាចផ្ដល់ថាមពលអ្វីខ្លះ ?**

មេរៀនទី

3

# សូរសំឡេងនិងតន្ត្រី

## ក. សូរសំឡេងផ្សេងៗនៅតាមមូលដ្ឋាន

- តើអ្នកធ្លាប់ឮសូរសំឡេងអ្វីខ្លះ ?




យើងអាចឮសូរសំឡេងប្លែកៗដែលបន្លឺចេញពីប្រភពផ្សេងៗដូចជា សំឡេងឡាន ម៉ូតូ សំឡេងភ្លេង ចម្រៀង សំឡេងស្រែកអឹងកង សំឡេងជួង សំឡេងសត្វស្រែក (មាន់ ទា ឆ្កែ ...) សំឡេងស្គរ ... ។

## ខ. លក្ខណៈសូរសំឡេង

- តើសូរសំឡេងទាំងអស់មានលក្ខណៈដូចម្ដេចខ្លះ ?



សូរសំឡេងទាំងអស់មានលក្ខណៈខុសៗគ្នា ។ សំឡេងខ្លះគ្រលរ ខ្លះស្រួយ ខ្លះរណ្ដំ ខ្លះញ័រ ខ្លះរងំ ... ។

## គ. ការបង្កើតសូរសំឡេងងាយៗនៃតន្ត្រី

- តើគេអាចបង្កើតសូរសំឡេងងាយៗរបស់តន្ត្រីដូចម្ដេចខ្លះ ?










អូ! សូរសំឡេងនេះដូចសំឡេងតន្ត្រីដែលគេប្រគំ

ដូចនេះសូរសំឡេងតន្ត្រីអាចកើតឡើងដោយប្រើសម្ភារៈងាយៗ ។



ក្នុងជីវិតរស់នៅប្រចាំថ្ងៃ យើងអាចឮសូរសំឡេងប្លែកៗ ជាច្រើន ។ សូរសំឡេងទាំងនោះមានលក្ខណៈខុសៗគ្នា ។ គេអាចបង្កើតសូរសំឡេងធ្វើជាតន្ត្រី ។



**ចូរគូសរង្វង់ជុំវិញអក្សរណាដែលជាចម្លើយត្រឹមត្រូវ ។**

- តើមនុស្សស្រីភាគច្រើន ច្រើនមានសំឡេងដូចម្ដេច ?

  ក. គ្រលរ

  ខ. ស្រួយ

  គ. ញ័រ

- តើសត្វតុកកែមានសំឡេងដូចម្ដេច ?

  ក. រំពង

  ខ. ស្រួយ

  គ. គ្រលរ

- តើស្គរមានសំឡេងដូចម្ដេច ?

  ក. រំពង

  ខ. គ្រលរ

  គ. ញ័រ

មេរៀនទី

# 4 ភាពអស្ចារ្យនៃផែនដី

## ក. ពេលថ្ងៃនិងពេលយប់

- តើពេលថ្ងៃនិងពេលយប់ខុសគ្នាដូចម្តេច ?




ពេលថ្ងៃ ខុសគ្នាពីពេលយប់ ។ ពេលថ្ងៃផែនដីទទួលពន្លឺនិងកម្តៅពីព្រះអាទិត្យ ។ ពេលយប់ផែនដីពុំទទួលបានពន្លឺនិងកម្តៅពីព្រះអាទិត្យទេ ។ ដូចនេះ ពេលយប់ផែនដីក្លាយជាងងឹត ។

## ខ. ទ្រង់ទ្រាយរបស់ភពផែនដី

- តើភពផែនដីមានរូបរាងដូចម្ដេច ?



ខាងលើនេះជារូបថតនៃភពផែនដី
ដែលយើងរស់នៅ ។ អ្នកវិទ្យាសាស្ត្រ
បានធ្វើរូបសំណាកនៃភពផែនដី
ដោយរូបភូគោលនេះ ។






ភពផែនដីមានទំហំធំណាស់ហើយវាមានរាងមូល ។ គេធ្វើភូគោលតាងឱ្យភពផែនដី ។

## គ. ការបង្កើតឱ្យមានថ្ងៃនិងយប់



ចូរសង្កេតមើលរូបភាព (ក)និង(ខ) ហើយកំណត់ចលនារបស់ភពផែនដី ក្នុងការបង្កើតឱ្យមានថ្ងៃនិងយប់ ។

ក

តើមនុស្សនេះត្រូវធ្វើចលនាដូចម្ដេច ដើម្បីឱ្យមុខរបស់គាត់ម្ដងត្រូវពន្លឺ ម្ដងត្រូវម្លប់ ?

ខ

ផែនដី

ព្រះអាទិត្យ

តើភពផែនដីត្រូវធ្វើចលនាដូចម្ដេចដើម្បីឱ្យពេលខ្លះនៃកន្លែងខ្លះភ្លឺនិងពេលខ្លះនៃកន្លែងខ្លះងងឹត ?

ផែនដីអាចធ្វើចលនាជុំវិញខ្លួនឯងផងនិងវិលជុំវិញព្រះអាទិត្យផង ។ រង្វិលជុំខ្លួនឯងរបស់ផែនដីបង្កើតបានជាថ្ងៃនិងយប់ ។ រង្វិលជុំវិញព្រះអាទិត្យបង្កើតបានជារដូវ ។ ឧទាហរណ៍ ៖ ប្រទេសកម្ពុជាមានរដូវពីរគឺ រដូវប្រាំងនិងរដូវវស្សា ។ រដូវវស្សាអំណោយផលដល់ការធ្វើដំណាំស្រូវ ។



ភពផែនដីមានទំហំធំហើយមូល ។ ផែនដីមានចលនាវិលជុំវិញខ្លួនឯងបង្កើតបានជាថ្ងៃនិងយប់ ។ ផែនដីធ្វើចលនាវិលជុំវិញព្រះអាទិត្យបង្កើតបានជារដូវ ។ នៅប្រទេសកម្ពុជាមានរដូវពីរគឺ រដូវប្រាំងនិងរដូវវស្សា ។



**ចូរភ្ជាប់ល្បះពីជួរ (ក) ទៅជួរ (ខ) ឱ្យមានន័យត្រឹមត្រូវ ។**

| ក | ខ |
|---|---|
| ១. ភពផែនដីមានទំហំ<br>២. ផែនដីអាចធ្វើចលនា<br>៣. ថ្ងៃនិងយប់កើតមានឡើងដោយសារ<br>៤. ផែនដីធ្វើចលនាវិលជុំវិញព្រះអាទិត្យ<br>៥. រង្វិលជុំនៃផែនដីជុំវិញព្រះអាទិត្យបង្កើត | - ផែនដីធ្វើចលនាវិលជុំវិញខ្លួនឯង ។<br>- ក្នុងរយៈពេលមួយឆ្នាំ ។<br>- វិលជុំវិញខ្លួនឯងផងនិងវិលជុំវិញព្រះអាទិត្យផង ។<br>- បានជារដូវ ។<br>- ធំហើយមានរាងមូល ។ |

មេរៀនទី

# 5 ការផ្លាស់ប្ដូរធាតុអាកាស

## ក. ធាតុអាកាស

- តើធាតុអាកាសជាអ្វី ?



ពេលព្រះអាទិត្យរះល្អ វាធ្វើឱ្យមានពន្លឺនិងកម្ដៅ ។



ពេលមានខ្យល់បក់យើងហាក់ដូចជាមានអារម្មណ៍ត្រជាក់ ។





ពេលយប់គ្មានពន្លឺព្រះអាទិត្យវាធ្វើឱ្យយើងត្រជាក់ ។

កាលណាគេនិយាយពី ខ្យល់ កម្ដៅ ធាតុត្រជាក់ គឺគេនិយាយពីធាតុអាកាស ដូចនេះធាតុអាកាសគឺជាបម្រែបម្រួលសភាពបរិយាកាសរយៈពេលខ្លី ។

## ២. ការប្រែប្រួលនៃធាតុអាកាស

- តើធាតុអាកាសប្រែប្រួលដូចម្ដេចខ្លះ ?

ពេលព្រះអាទិត្យរះ ខ្យល់ក្ដៅ ពេលនោះ គេថាថ្ងៃនេះធាតុអាកាសក្ដៅ ។

ពេលមានពពកច្រើនបាំងព្រះអាទិត្យ ខ្យល់មិនសូវក្ដៅ គេថាថ្ងៃនេះធាតុអាកាសត្រជាក់ស្រួល ។

ពេលព្រះអាទិត្យរះ ខ្យល់បក់ពពករសាត់ គេថាថ្ងៃនេះមានខ្យល់ ។

ពេលមេឃខ្មៅងងឹត (ពពកខ្មៅក្រាស់បាំងព្រះអាទិត្យ) គេថាជិតភ្លៀងហើយ ។

ដូចនេះធាតុអាកាសប្រែប្រួលមិនទៀងជួនក្ដៅ ជួនត្រជាក់ ជួនភ្លៀង ជួនខ្យល់ ... ។

## គ. ពន្លឺនិងកម្ដៅព្រះអាទិត្យ

- តើព្រះអាទិត្យធ្វើឱ្យធាតុអាកាសប្រែប្រួលដូចម្ដេចខ្លះ ?

ព្រះអាទិត្យកម្ដៅផែនដី ទឹក ខ្យល់ និងវត្ថុផ្សេងៗទៀត ។ ពន្លឺព្រះអាទិត្យធ្វើឱ្យធាតុអាកាសក្ដៅ ។ ពេលពន្លឺព្រះអាទិត្យថយចុះធាតុអាកាសក៏ចុះត្រជាក់ ។ គេវាស់កម្ដៅនៃបរិយាកាសបានដោយប្រើឧបករណ៍ឈ្មោះ **ស៊ីតុណ្ហមាត្រ ឬ ទែម៉ូម៉ែត្រ** ។



ពេលព្រឹក



ថ្ងៃត្រង់



ពេលល្ងាច



ព្រះអាទិត្យអាចធ្វើឱ្យធាតុអាកាសប្រែប្រួលពីក្ដៅទៅត្រជាក់និងពីត្រជាក់ទៅក្ដៅ ។ គេប្រើ**សីតុណ្ហមាត្រ ឬ ទែម៉ូម៉ែត្រ**សម្រាប់វាស់កម្ដៅ ។

## ឃ. លំនាំធាតុអាកាសប្រចាំថ្ងៃនិងផលប្រយោជន៍




លំនាំធាតុអាកាសប្រចាំថ្ងៃអាចផ្ដល់ផលប្រយោជន៍យ៉ាងច្រើនដូចជា ធ្វើឱ្យយើងចេះត្រៀមលក្ខណៈ ធ្វើឱ្យយើងមានសុខភាពល្អ ... ។



ធាតុអាកាសគឺជាបម្រែបម្រួលសភាពបរិយាកាសរយៈពេលខ្លី ។ ធាតុអាកាសមានការប្រែប្រួលមិនទៀងជួនក្ដៅ ជួនត្រជាក់ ជួនភ្លៀង ... ។ ពន្លឺព្រះអាទិត្យធ្វើឱ្យធាតុអាកាសប្រែប្រួល ។ ការប្រែប្រួលធាតុអាកាសធ្វើឱ្យមានការប្រែប្រួលសីតុណ្ហភាព ។ ឧបករណ៍សម្រាប់វាស់សីតុណ្ហភាពហៅថាសីតុណ្ហមាត្រ ឬ ទែម៉ូម៉ែត្រ ។ លំនាំធាតុអាកាសប្រចាំថ្ងៃផ្ដល់ផលប្រយោជន៍ច្រើនណាស់ដល់មនុស្សយើង ។



**១. ចូរគូសរង្វង់ជុំវិញអក្សរណាដែលជាចម្លើយត្រឹមត្រូវ ។**

- ចលនាខ្យល់នៅពេលមានព្យុះគឺ
  - ក. បក់លឿន
  - ខ. បក់លឿនខ្លាំង
  - គ. បក់តិចៗ ។
- ខ្ញុំរៀបចំធ្វើដំណើរទៅសាលារៀន ស្រាប់តែពេលនោះមេឃមានពពកខ្មៅច្រើនកំពុងរសាត់យ៉ាងលឿន ដូចនេះខ្ញុំត្រូវ
  - ក. យកម្ហូបទៅតាមខ្លួន
  - ខ. យកអាវភ្លៀងទៅតាមខ្លួន
  - គ. យកអាវរងាទៅតាមខ្លួន ។

**២. ចូរសង្កេតមើលពពក តើមានប៉ុន្មានប្រភេទ ? ចូរគូរនិងផាត់ពណ៌ប្រភេទពពកទាំងនោះ ។**